# ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសំរួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៥ ខែតុលា ឆ្នាំ២០១០


## Gov't Funds Push to Meet Rice Export Goal

*$40 million allocated toward meeting Hun Sen's million-ton mark*

BY HUL REAKSMEY
THE CAMBODIA DAILY

The Agriculture Ministry announced yesterday that it will spend more than $40 million on rice processing, trade facilitation and market research by 2015 in order to meet the 1-million-ton export goal set by Prime Minister Hun Sen.

The draft financial plan for the new rice policy released yesterday during a consultation seminar called for $44,490,750 in spending between now and 2015 to grow the farming and processing sectors and streamline the exportation process.

Agriculture Ministry officials said yesterday that they had yet to determine whether the government itself would run rice-milling facilities.

"We are discussing [government rice milling] in meetings," said Secretary of State Chan Tong Yves.

Agriculture Minister Chan Sarun said yesterday that his ministry's current priority was to move the rice-farming sector away from its subsistence roots.

"Farmers have to change from producing rice as a local food to producing rice as a commercial product," Mr Sarun said. "The agriculture community will fuel the growth of production in the future."

According to Mr Sarun, the global demand for rice will rise to 496 million tons in 2020 and 553 million tons in 2035, a roughly 20 percent expansion of the current 439 million ton market. Mr Sarun added that, if successfully implemented, the Agriculture Ministry's plan would not only help Cambodia hit the 1-million-ton mark, but potentially increase the country's production capacity to 4 million tons.

Last week, the Agriculture Ministry named the 10 varieties of rice they will ask farmers to plant as part of the rice policy.

Mong Reththy, chairman of the Mong Reththy group, said yesterday that his company and the private sector were supportive of the Agriculture Ministry's push for farmers to use more commercially viable seeds.

"The private sector is cooperating with the ministry to push for greater production in order to meet demand from customers," Mr Reththy said, adding that his company was building a $100,000 rice milling facility in Preah Sihanouk province.

"If we rely on other companies' rice mills, we are afraid there will not be room for us," Mr Reththy said. "I hope to target France as my first main market."

Thon Virak, general director of the state-owned rice export company Green Trade, said yesterday that it was difficult to guess whether or not the rice plan was backed by adequate funding because no one knows the current export levels.

"The first step has to be measuring the movement [of rice exports]," Mr Virak said. "Then we can see how much we can add and how much we are capable of producing."

## រដ្ឋាភិបាលនឹងចំណាយប្រាក់ជាង៤០លានដុល្លារក្នុងការនាំអង្ករចេញ

ដោយ ហ៊ុយ រស្មី
THE CAMBODIA DAILY

ក្រសួងកសិកម្មបានមានប្រកាសកាលពីម្សិលមិញថា ខ្លួននឹងចំណាយប្រាក់ចំនួន៤០លានដុល្លារទៅលើការកិនស្រូវការជួយសម្រួលផ្នែកពាណិជ្ជកម្ម និងការស្រាវជ្រាវទីផ្សារត្រឹមឆ្នាំ២០១៥ ដើម្បីបំពេញតាមគោលបំណងនាំអង្ករចេញ១លានតោន ដែលកំណត់ ដោយលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ។

សេចក្តីព្រាងផែ្នកហិរញ្ញវត្ថុសម្រាប់គោលនយោបាយនាំអង្ករចេញថ្មីនេះ ដែលត្រូវបានចេញកាលពីម្សិលមិញអំឡុងសិក្ខាសាលាពិគ្រោះយោបល់មួយបានអំពាវនាវរកប្រាក់ចំនួន ៤៤.៤៩០.៧៥០ដុល្លារក្នុងការចំណាយរវាងពេលនេះ និងឆ្នាំ២០១៥ ដើម្បីបង្កើនវិស័យកសិកម្ម និងផ្នែកកិនស្រូវព្រមទាំងបង្កើនប្រសិទ្ធភាពនៃដំណើរការនាំចេញផង ។

ក្រុមមន្ត្រីក្រសួងកសិកម្មបាននិយាយកាលពីម្សិលមិញនេះថា ពួកមិនទាន់បានកំណត់នេះឡើយ ថាតើរដ្ឋាភិបាលខ្លួនឯងនឹងដំណើរការរោងម៉ាស៊ីនកិនស្រូវ ឬយ៉ាងណាទេ ។

លោក ច័ន្ទ តុងអ៊ីវ រដ្ឋលេខាធិការបានមានប្រសាសន៍កាលពីម្សិលមិញ "យើងកំពុងតែពិភាក្សាអំពី (រោងម៉ាស៊ីនកិនស្រូវ) របស់រដ្ឋាភិបាលនៅក្នុងកិច្ចប្រជុំនានា" ។

លោក ច័ន្ទ សារុន រដ្ឋមន្ត្រីក្រសួងកសិកម្មបានមានប្រសាសន៍កាលពីម្សិលមិញថា អាទិភាពថ្មីៗរបស់ក្រសួងលោក គឺត្រូវបញ្ចៀសវិស័យកសិកម្មស្រូវឱ្យផុតពីទម្លាប់នៃការប្រើប្រាស់ស្រូវសម្រាប់តែការចិញ្ចឹមជីវិតរបស់ខ្លួននោះ ។

លោក សារុន បានមានប្រសាសន៍ថា "ប្រជាកសិកម្មត្រូវតែផ្លាស់ប្តូរពីការផលិតអង្ករជាអាហារក្នុងស្រុកទៅជាការផលិតអង្ករជាផលិតផលពាណិជ្ជកម្មវិញ ។ សហគមន៍កសិកម្មនឹងជំរុញកំណើនផលិតកម្មនៅពេលអនាគត" ។

យោងតាមលោក សារុន បានឱ្យដឹងថា តម្រូវការសាកលលោកសម្រាប់អង្ករនឹងកើនឡើងដល់ទៅ៤៩៦លានតោនក្នុងឆ្នាំ២០២០ និង៥៥៣លានតោនក្នុងឆ្នាំ២០៣៥ ជាកំណើនប្រមាណ២០ភាគរយលើសទីផ្សារដែលត្រូវ៤៣៩លានតោននាបច្ចុប្បន្ននេះ។ លោក សារុន បានមានប្រសាសន៍បន្ថែមថា ប្រសិនបើអនុវត្តបានជោគជ័យផែនការក្រសួងកសិកម្មនេះ នឹងមិនគ្រាន់តែជួយឱ្យកម្ពុជាផលិតអង្ករឱ្យបាន១លានតោនប៉ុណ្ណោះទេ ក៏ប៉ុន្តែក៏នឹងអាចបង្កើនសមត្ថភាពផលិតក្នុងប្រទេសដល់ទៅ៤លានតោនផងដែរ ។

កាលពីសប្តាហ៍មុន ក្រសួងកសិកម្មបានកំណត់ឈ្មោះអង្ករ១០ប្រភេទផ្សេងៗគ្នាដែលពួកគេនឹងស្នើឱ្យប្រជាកសិករដាំស្រូវជាផ្នែកនៃគោលនយោបាយនាំអង្ករចេញនេះ។ ប្រភេទអង្ករដែលបានជ្រើសរើសនេះ ដែលភាគច្រើនត្រូវបានប្រើប្រាស់ជាទូទៅរួចហើយនោះ ជាប្រភេទអង្ករដែលមានគុណភាពខ្ពស់សម្រាប់នាំចេញ ។

លោក ម៉ុង ឫទ្ធី បានថ្លែងថា " ផ្នែកឯកជនកំពុងសហការជាមួយក្រុមហ៊ុន ដើម្បីជំរុញការផលិតឱ្យបានធំជាងមុនដើម្បីបំពេញតម្រូវការរបស់អតិថិជន " លោកបន្ថែមថា ក្រុមហ៊ុនរបស់លោកកំពុងតែបង្កើតរោងម៉ាស៊ីនកិនស្រូវដែលមានតម្លៃ ១០០.០០០ ដុល្លារនៅខេត្តព្រះសីហនុ ។ លោកបានបន្ថែមថា "ប្រសិនបើយើងពឹងផ្អែកលើរោងម៉ាស៊ីនកិនស្រូវរបស់ក្រុមហ៊ុនផ្សេងៗទៀត យើងបារម្ភថា នឹងមិនមានឱកាសសម្រាប់យើងឡើយ ។ ខ្ញុំសង្ឃឹមនឹងកំណត់យកប្រទេសបារាំងជាទីផ្សារសំខាន់ទីមួយរបស់ខ្ញុំ" ។

លោក ថុន វីរៈ អគ្គនាយករបស់ក្រុមហ៊ុន Green Trade ដែលគ្រប់គ្រងដោយរដ្ឋ ដែលនាំចេញបានមានប្រសាសន៍កាលពីម្សិលមិញថា មានការលំបាកក្នុងការព្យាករណ៍ថា តើផែនការនាំអង្ករចេញនេះនឹងត្រូវបានគាំទ្រដោយមូលនិធិគ្រប់គ្រាន់ដើម្បីសម្រេចបាននូវគោលដៅរបស់ខ្លួនដែរឬអត់ ពីព្រោះនរណាដឹងអំពីកម្រិតនៃការនាំចេញបច្ចុប្បន្ននេះទេ ។

លោក វីរៈ បានមានប្រសាសន៍ថា "ជំហានដំបូង គឺត្រូវវាស់វែងចលនា (នៃការនាំអង្ករចេញ) សិន។ បន្ទាប់មកយើងអាចដឹងថា តើយើងអាចបន្ថែមចំនួនប៉ុន្មានទៀត និងថាតើយើងអាចផលិតចំនួនប៉ុន្មាន ៕

## No Word on Hun Sen's Meeting With UN Head

BY PHORN BOPHA AND ZSOMBOR PETER
THE CAMBODIA DAILY

Government officials yesterday said they had no idea what Prime Minister Hun Sen would say to UN Secretary-General Ban Ki-moon when the two meet less than two weeks from now.



Information Minister Khieu Kanharith, Council of Ministers spokesman Phay Siphan and Hun Sen's deputy Cabinet chief Nget Borey all said yesterday they did not know what topics would be broached during the meeting.

A statement posted on the Foreign Affairs Ministry's website yesterday said that Mr Ban would be in Cambodia from Oct 26 through Oct 28, during which time he plans to visit the Khmer Rouge tribunal and Khmer-Soviet Friendship Hospital and hold an "official talk" with the prime minister.

Pressed for details, Foreign Affairs spokesman Koy Kuong said only that their talk would touch on "the cooperation between Cambodia and the UN."

Eang Sophalleth, an assistant to the premier, said it was impossible to say what the two might discuss.

"His Excellency Ki-moon is not here yet. I cannot tell you," he said. "I can only tell you after their meeting."

Mr Hun Sen's visit with Mr Ban, however, will come less than two months after he sent the UN Security Council and General Assembly a caustic pair of letters complaining that Thailand had threatened Cambodia with military aggression.

In the Aug 8 letters, the premier accused Thai Prime Minister Abhisit Vejjajiva of threatening to use "both diplomatic and military" means to bolster his country's position in its border dispute with Cambodia over land near Preah Vihear temple.

Mr Abhisit sent a letter to the UN two days later denying the charge.

More recently, Cambodia has dismissed a Thai government agency's claims that Thai opposition loyalists trained on Cambodian soil for a mission to assassinate Mr Abhisit.

The Bangkok Post reported yesterday that Thai Foreign Minister Kasit Piromya said Thailand would raise the border issue when Mr Ban visits Bangkok on Oct 26, but not the diplomatic row over the assassination claims.

Ann Lund, head of the UN Resident Coordinator's Office in Cambodia, said she had no details about Mr Ban's visit.

## គ្មានព័ត៌មានស្តីពីជំនួបរវាង ហ៊ុន សែន ជាមួយអគ្គលេខាធិការ អ.ស.ប. ទេ

ដោយ ផន បុប្ផា និង ZSOMBER PETER
THE CAMBODIA DAILY

កាលពីម្សិលមិញ ក្រុមមន្ត្រីរដ្ឋាភិបាលបាននិយាយថា ពួកមិនដឹងថា តើលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន នឹងមានប្រសាសន៍អ្វីទៅកាន់លោក បាន គីមូន ជាអគ្គលេខាធិការអង្គការសហប្រជាជាតិនោះទេ នៅពេលដែលលោកទាំងពីរជួបគ្នានៅមិនដល់ពីរសប្តាហ៍នាពេលខាងមុខនេះ។

លោក ខៀវ កាញារីទ្ធ រដ្ឋមន្ត្រីក្រសួងព័ត៌មាន លោក ផៃ ស៊ីផាន អ្នកនាំពាក្យទីស្តីការគណៈរដ្ឋមន្ត្រី និងលោក ង៉ែត បូរី អនុប្រធានខុទ្ទកាល័យរបស់លោក ហ៊ុន សែន កាលពីម្សិលមិញសុទ្ធតែបានមានប្រសាសន៍ថា ពួកគាត់មិនដឹងថា តើប្រធានបទអ្វីនឹងត្រូវយកមកពិភាក្សាអំឡុងជំនួបនេះទេ។

សេចក្តីថ្លែងការណ៍មួយដែលដាក់នៅក្នុងគេហទំព័ររបស់ក្រសួងការបរទេសបានឱ្យដឹងកាលពីម្សិលមិញថា លោក បាន គីមូន នឹងស្ថិតនៅក្នុងប្រទេសកម្ពុជាពីថ្ងៃទី២៦ ខែតុលាដល់ថ្ងៃទី២៨ ខែតុលា ដែលអំឡុងពេលនោះលោកមានគម្រោងធ្វើទស្សនកិច្ចនៅសាលាក្តីខ្មែរក្រហម និងមន្ទីរពេទ្យខ្មែរ-សូវៀត និងធ្វើ "ការពិភាក្សាជាផ្លូវការ" ជាមួយលោកនាយករដ្ឋមន្ត្រី ។

ដោយត្រូវបានទទូចសុំឱ្យផ្តល់ព័ត៌មានលំអិតនោះ លោក កុយ គួង អ្នកនាំពាក្យក្រសួងការបរទេសគ្រាន់តែបានមានប្រសាសន៍ថា ការពិភាក្សារបស់ពួកគាត់នឹងផ្តោតលើ "កិច្ចសហប្រតិបត្តិការរវាងប្រទេសកម្ពុជា និងអង្គការសហប្រជាជាតិ" ។

លោក អៀង សុផាឡែត ជាជំនួយការរបស់លោកនាយករដ្ឋមន្ត្រីបានមានប្រសាសន៍ថា លោកមិនអាចនិយាយបានថា តើលោកទាំងពីរនឹងពិភាក្សាអំពីអ្វីនោះទេ ។

លោកបានមានប្រសាសន៍ថា "ឯកឧត្តម បាន គីមូន មិនទាន់មកដល់កម្ពុជានៅឡើយទេ ។ ខ្ញុំមិនអាចប្រាប់អ្នកបានឡើយ ។ ខ្ញុំអាចប្រាប់អ្នកបានតែនៅក្រោយពេលជំនួបរបស់ពួកគាត់តែប៉ុណ្ណោះ ។

ទោះជាយ៉ាងណា ជំនួបរបស់លោក ហ៊ុន សែន ជាមួយលោក បាន គីមូន នឹងកើនមានឡើងមិនដល់ពីរខែផងទេ ក្រោយពីលោកបានបញ្ជូនទៅអង្គការសន្តិសុខ និងមហាសន្និបាតអង្គការសហប្រជាជាតិនូវលិខិតដ៏មុឺងម៉ាត់ពីរច្បាប់ ដែលប្តឹងថា ប្រទេសថៃ បានគំរាមឈ្លានពានកម្ពុជាដោយប្រើយោធា។

នៅក្នុងលិខិតចុះថ្ងៃទី៨ ខែសីហានោះ លោកនាយករដ្ឋមន្ត្រីបានចោទប្រកាន់លោកនាយករដ្ឋមន្ត្រីថៃ អភិស៊ិត វីចាជីវ៉ា ថាបានគំរាមប្រើទាំងមធ្យោបាយ "ការទូតនិងយោធា" ដើម្បីពង្រឹងជំហររបស់ប្រទេសលោកនៅក្នុងជម្លោះព្រំដែនរបស់ខ្លួនជាមួយកម្ពុជាជុំវិញដីនៅជិតប្រាសាទព្រះវិហារ ។

លោក អភិស៊ិត បានផ្ញើលិខិតឆ្លើយតបមួយច្បាប់ទៅអង្គការសហប្រជាជាតិពីរថ្ងៃក្រោយមកដោយបដិសេធចំពោះការចោទប្រកាន់នេះ ។

នៅពេលថ្មីៗនេះ ប្រទេសកម្ពុជាបានច្រានចោលការអះអាងរបស់ទីភ្នាក់ងារថៃមួយដែលថា ក្រុមអ្នកស្មោះត្រង់នឹងគណបក្សប្រឆាំងរបស់ថៃបានហ្វឹកហាត់នៅលើទឹកដីកម្ពុជាសម្រាប់បេសកកម្មធ្វើឃាតលោក អភិស៊ិត ។

កាលពីម្សិលមិញកាសែតបាងកកប៉ុស្តិ៍ បានរាយការណ៍ថា លោក កាស៊ិត ភិរម្យ រដ្ឋមន្ត្រីក្រសួងការបរទេសថៃ បានមានប្រសាសន៍ថា ប្រទេសថៃ នឹងលើកឡើងពីបញ្ហាព្រំដែននៅពេលដែលលោក បាន គីមូន ធ្វើទស្សនកិច្ចនៅទីក្រុងបាងកកនៅថ្ងៃទី២៦ ខែតុលា ប៉ុន្តែនឹងមិនលើកពីជម្លោះការទូតជុំវិញការអះអាងអំពីការធ្វើឃាតនេះទេ។

លោកស្រី អាន លុន ប្រធានការិយាល័យអ្នកសម្របសម្រួលរបស់អង្គការសហប្រជាជាតិប្រចាំ នៅប្រទេសកម្ពុជា បានមានប្រសាសន៍ថា លោកស្រីមិនមានព័ត៌មានលំអិតអំពីការធ្វើទស្សនកិច្ចរបស់លោក បាន គីមូន ទេ ៕

# អាថ៌កំបាំង និងសិល្បៈនៃជីវិត
# SECRET AND ART OF LIVING



(តមកពីលេខមុន)

រៀបរៀងដោយ
លោក ម៉ៅ ច័ន្ទសំណុំ

•••ណែនតឹងតែងមានព្រំសីមា Limit ដែលយើងពិសោធន៍ឃើញប្រចាំថ្ងៃនៃជីវិតប្រកបដោយការភិតភ័យ អរព្រួយ កើតទុក្ខ ស្រេះ មិនចេះគ្រប់ អន្ទះសារ (ដូចត្រីរស់ដែលគេ លើកពីទឹកដាក់លើគោកដូច្នោះឯង)។ ទី២/បើមុជទឹកឱ្យជ្រៅហួសផុតក្របខណ្ឌចង្អៀតនេះទៅមនុស្សអាចទៅដល់បណ្ដូលរួម Whole ដែលជាប្រភពដើម បណ្ដូលជីវិត **គឺកុងស្យនិសបរិសុទ្ធ** នេះ ដែលមានលក្ខណៈជាលំហរ Space ធំទូលាយ ស្រឡះស្រឡៃងក្នុងចិត្ត គ្មានកង្វល់ គ្មានភ័យខ្លាចអ្វី គ្រប់គ្រាន់ Full ឬពេញលេញ Absolute ស្ងប់ស្ងាត់ សន្តិភាព សេរីភាពផ្លូវចិត្ត Freedom ភាពរីករាយ បរមសុខ bliss ពេញដោយមេត្តា ករុណា Love compassion សណ្ដោសប្រណីចំពោះមនុស្សសត្វផងទាំងពួង។ មនុសអាចធ្វើពិសោធន៍គុណភាពផ្លូវចិត្តដូចរៀបរាប់ខាងលើដោយខ្លួនឯង តាមការហាត់សមាធិ)។

ជាក់ស្ដែង យើងពុំអាចមើលឃើញកុងស្យនិសបរិសុទ្ធនេះឡើយ ប្រៀបដូចជា កាំបិទពុំអាចចិត្តខ្លួនឯងបាន ឬប្រៀបមួយទៀតដូចជាភ្នែកពុំអាចមើលភ្នែកខ្លួនឯងបាន។

**សូមពិនិត្យចំណុចតូចៗក្នុងជីវិតជាក់ស្ដែង :**

ទី១/ តើអ្នកដែលរស់នៅបរទេសឬទេ? ខ្ញុំធ្វើការនៅសហរដ្ឋអាមេរិក មើលចុះសុទ្ធតែជាជនជាតិដទៃ មកប្រាស្រ័យទាក់ទង ពេលខ្លះជនជាតិខ្មែរយើងលេចមុខមកមួយៗ ខ្ញុំហាក់មានអារម្មណ៍សប្បាយរីករាយនឹងជួបប្រាស្រ័យ ហាក់ជួបបងប្អូនមីងមា ចង់ជួយយកអាសារ ជួយណែនាំធ្វើយ៉ាងណាឱ្យបានប្រយោជន៍។ល។ ហេតុអ្វី? ព្រោះធាតុបុគ្គលរួញតូចទៅ ឯធាតុរួមចូលមកជំនួស មានឥទ្ធិពលមកលើខ្លួន (ធាតុរួមនោះគឺ ពូជសាសន៍ខ្មែរដែលកប់ក្នុងខ្លួន)។

ទី២/ នៅពេលដែលមនុស្សជាតិមួយជួបប្រទះគ្រោះមហន្តរាយធម្មជាតិ ដូចជាទឹកជំនន់ រញ្ជួយផែនដី អគ្គីភ័យ មនុស្សនានាដែលនៅជុំវិញ ស្ម័គ្រចិត្តចូលជួយស្រោចស្រង់ជីវិតអ្នកដទៃ ដោយឥតគិតអំពីថាតើអ្នកនោះជានរណា ជាតិសាសន៍អ្វី ពណ៌សំបុរអ្វី សាសនាអ្វីឡើយ ឱ្យតែឈ្មោះថា មនុស្សជួយទាំងអស់។ តួយ៉ាងការរញ្ជួយផែនដីនៅប្រទេសចិនថ្មីៗនេះ ជាតិសាសន៍នានាលើសកលលោកចូលទៅជួយ សូម្បីតែប្រទេសជាកូរសត្រូវនឹងចិន ក៏ចូលទៅដែរ។ នេះជាការសំដែងនៃធាតុរួមក្នុងខ្លួនមនុស្សយើងម្នាក់ៗ។

ទី៣/ ម្ដាយឪពុកពុំដែលប្រកាន់ទោសកំហុស ឬប្រកែកប្រណាំ ច្រណែនឈ្នានីសដល់កូនចៅឡើយ មានបំណងតែម្យ៉ាងគឺ សេចក្ដីសុខសាន្តនឹងរីកចំរើនដល់ពួកគេ។ នេះជាការសំដែងនៃធាតុរួមក្នុងមនុស្សនេះឯង។ ក្នុងជីវិតសត្វ ក៏យើងឃើញមេតែងគ្រប់គ្រងការពារកូនវាល្អឥតខ្ចោះ។ មានរឿងនិទានមួយដំណាលថា ព្រានព្រៃម្នាក់អង្គុយរង់ចាំបាញ់ប្រើសយ៉ាងយូរ។ រំពេចនោះ ប្រើសញីមគ្រប់ខែរត់កាត់ហើយវាត្រូវព្រានបាញ់ឱ្យរបួសជាទម្ងន់ ហូរឈាមតតាក់ រត់ត្រដេត្រដរទៅសំងំលាក់ខ្លួនក្នុងគុម្ពោតជិតនោះ។ ព្រានបានរត់តាម ហើយប្រទះឃើញសត្វប្រើសដួលដេកក្នុងថ្លុកឈាម ហើយរលូតកូនមកក្រៅ។ មេប្រើសពុំគិតដល់ជីវិតរបស់ខ្លួនឡើយ វាអោនក្បាលរុញកូនឱ្យផុតពីថ្លុកឈាម រួចជីវិត ហើយបន្តលិតកូនដោយថ្នាក់ថ្នម រហូតតល់តែដាច់ខ្យល់ស្លាប់ខ្លួនឯង។ បុរសព្រានកើតចិត្តសង្វេកអាណិតមេប្រើសយ៉ាងពន់ពេក គាត់ប្ដេជ្ញាឈប់សម្លាប់សត្វពីថ្ងៃនោះតទៅ។

ទី៤/ ចិត្តមនុស្សយើងម្នាក់ៗមានពីរផ្នែក : ផ្នែកខាងលើមានអារម្មណ៍ គំនិត រំជួលចិត្ត ប្រតិកម្ម ទំនោ។ល។ ទាំងនេះជាផ្នែកដោយឡែកជាបុគ្គលិកលក្ខណៈមនុស្សម្នាក់ៗ ខុសៗគ្នា ។ អ្នកខ្លះចូលចិត្តគិតឬលេងសើច ឬសាសនា ឬអក្សរសាស្ត្រ ឬតែងខ្លួន។ល។ ចូលជ្រៅទៅក្នុងដល់បណ្ដូលប្រភពដើមនៃមនុស្សមានចំណុចរួមតែមួយគឺជីវិត ឬកុងស្យនិសបរិសុទ្ធនេះឯង ។ អាស្រ័យហេតុនេះ ជនណាដែលសំរេចបានឃើញបណ្ដូល ឬធម្មជាតិពិតរបស់មនុស្សនេះគេលែងប្រកាន់ Forgive នឹងពាក្យពេចន៍គំរោះគំរោយ ឬការប្រទិចផ្ដាសារបស់ជនដទៃមកលើខ្លួន ពីព្រោះគេយល់ដឹងយ៉ាងច្បាស់លាស់ថា ជនទាំងនោះធ្វើសកម្មភាពនោះៗដោយពុំដឹងខ្លួនឡើយ។ ប្រៀបដូចមនុស្សចាស់ពុំប្រកាន់នឹងកូនក្មេងឡើយ។ ចំណុចនេះមានបញ្ជាក់ច្បាស់ក្នុងរឿងព្រះយេស៊ូស្រាប់។ ព្រះយេស៊ូត្រូវទទួលការធ្វើបាបពីសំណាក់អ្នកកាន់អំណាច និងកងទ័ពរហូតដល់ចាប់ទ្រង់ទៅចងឆ្កាងសម្លាប់ ប៉ុន្តែទ្រង់នៅតែអនុគ្រោះដល់ពួកគេ រហូតដល់ទ្រង់រៀងអស់ជីវិត លោកពោលថា "ពួកគេធ្វើអំពើទាំងអស់នេះ គេពុំដឹងសោះឡើយ ចូរអនុគ្រោះពួកគេផងចុះ!!"។ (មានន័យថា ពួកគេនៅក្រោមអំណាចនៃផ្ទៃចិត្តខាងលើតែប៉ុណ្ណោះ បណ្ដូលចិត្តមនុស្សដូចៗគ្នាទេ)។

ការកើតមកជាមនុស្សនេះ យើងមានធាតុទាំងពីរនេះជាប់នឹងខ្លួន : ធាតុរួម និងធាតុបុគ្គល ។ តាមជាក់ស្ដែង ធាតុបុគ្គលបានដើរតួរខ្លាំងជាង និងគ្របដណ្ដប់ធាតុរួមឱ្យលិចជ្រៅបាត់រស្មី នេះជាធាតុនាំឱ្យជីវិតបាត់តុល្យភាព ក្រៀមក្រោះ ធ្លាក់ក្នុងភាពខ្មៅងងឹត។ ជីវិតត្រូវការតុល្យភាពទាំងពីរផ្នែកនេះ ទាំងបុគ្គល ទាំងរួម។ តាមការស្រាវជ្រាវខាងលើការរកតុល្យភាពខាងក្នុងខ្លួននេះ ពោលគឺរកឱ្យឃើញធម្មជាតិពិត The human´s true nature គឺជាចំណុចមូលដ្ឋានបំផុត សំខាន់បំផុត សំរាប់ជីវិតមនុស្សយើងម្នាក់ៗ ជាគោលបំណងនៃជីវិត។ ខ្ញុំយល់ថា សាសនានិងវិស័យចេតោនិយម Spiritualism បានបំរើមនុស្សក្នុងផ្នែកនេះយ៉ាងពិតប្រាកដ ជាក់ស្ដែងបើមនុស្សកើតទុក្ខ គេរត់រកឱ្យសាសនាជួយ។

**(7) កុងស្យនិសបរិសុទ្ធមាន ចិរកអនន្ត Eternity:**

តើមនុស្សស្លាប់ហើយ កើតឡើងវិញឬទេ តើអ្វីដែលនឹងទៅកើតទៀត? តើហេតុអ្វីបានជាមានបាតុភូតបរិនិព្វាន (មានន័យថាលែងកើត លែងស្លាប់ទៅតទៅទៀត)? ខ្ញុំសូមអនុញ្ញាតសាកល្បងព្យល់បាតុភូតកើត និងស្លាប់ កម្មពាររបស់មនុស្ស/សត្វ និងការវិវត្តន៍របស់របស់ធម្មជាតិក្នុងក្របខណ្ឌចក្រវាឡយើងនេះ (លោកធាតុវិទ្យា Cosmology) ដោយផ្អែកលើឯកសារសាសនានានាដូចតទៅ :

**(សូមរង់ចាំអានលេខក្រោយបន្តទៀត)**

ទទួលថតវីឌីអូ និងរូបថតសន្ទឹក
ស្ទាត់ជំនាញផ្នែក អាពាហ៍ពិពាហ៍
ខួបកំណើត បុណ្យទាន និង ពិធីផ្សេងៗ
ទទួលកាត់តវីឌីអូ ការាអូខេ
ទទួលប្តូរប្រព័ន្ធ PAL ទៅ NTSC
ទទួលថតសំរាប់ផ្សាយពាណិជ្ជកម្ម

មានបទពិសោធន៍ជាង ២០ឆ្នាំ
ធានាគុណភាពល្អបំផុត
បានលទ្ធផលយ៉ាងឆាប់រហ័ស

**CLICKS STUDIO**

*Video & Photography*



**267-506-8639**






សូមទាក់ទង:

| | |
|---|---|
| ពិសិដ្ឋ | 410-940-9338 |
| សុភាព | 267-767-2655 |
| សួន | 267-253-9302 |
| ចំរើន | 267-632-4768 |

កាវីតន្ត្រី

# រាយនាមសប្បុរសជនដែលចូលរួមឧបត្ថម្ភក្នុងពិធីរាត្រីស្រមោលសរ ដើម្បីជួយលើកទឹកចិត្តដល់កងទ័ពខ្មែរដែលឈរជើងការពារនៅតំបន់ប្រាសាទព្រះវិហារ :

គណៈកម្មាធិការរៀបចំកម្មវិធីរាត្រីស្រមោលសរ ដើម្បីរៃអង្គាសថវិការជួយឧបត្ថម្ភដល់កងទ័ព ខ្មែរដែល កំពុងឈរជើងការពារនៅតំបន់ប្រាសាទព្រះវិហារយើងខ្ញុំមានកិត្តិយសសូមថ្លែងអំណរគុណយ៉ាងជ្រាលជ្រៅដល់ ឯកឧត្តម លោកជំទាវ លោក លោកស្រី អ្នកនាង កញ្ញាទាំងអស់ដែលបានចូលរួមឧបត្ថម្ភជាថវិការ និងខំចំណាយពេលវេលាដ៏មានតំលៃ ដើម្បីជួយលើកទឹកចត្តិដល់កងទ័ពខ្មែរយើង ។ សូម ឯកឧត្តម លោកជំទាវ លោក លោកស្រី អ្នកនាងកញ្ញាទាំងអស់ទទួលនៅពុទ្ធពរទាំងបួនប្រការ គឺ អាយុ វណ្ណៈ សុខៈ ពលៈ កុំបីឃ្លានឃ្លាតឡើយ ។

| | | | |
|---|---|---|---|
| ឯកឧត្តម ហែម ហេង ( ឯកអគ្គរាជទូតកម្ពុជាប្រចាំសហរដ្ឋអាមេរិក ) | $ ២០០ | លោក ញាន រ៉ុន និងភរិយា | $ ៤៥ |
| ឯកឧត្តម អ៊ា ស៊ីលា ( តំណាងអចិន្ត្រៃយ៍រងប្រចាំអង្គការសហប្រជាជាតិ ) | $ ១០០ | លោក ឡញូ គួន | $ ៦០ |
| | | កញ្ញា ស្រី លក្ខណ | $ ៧០ |
| | | លោក ផល្លី និង សារ៉ាយ សៀង | $ ៥០ |
| លោក ដា វីន និង អាន ទូម | $ ៥៥ | លោក ថៅកែ សេ និងភរិយា | $ ១២០ |
| លោក ប៊ុន ផុន | $ ២០ | លោក ទីវ លន និង ហ៊ាន ជើត | $ ៦០ |
| លោក វ៉ាង ប៉ុច | $ ២០ | លោក ឈុន ជា និង ប៊ុន | $ ១០៣ |
| លោក មាស ថាវ៉េត | $ ៤០ | លោក ថ | $ ២៥ |
| កញ្ញា ម៉ៃ និងកញ្ញា លីដា | $ ៦០ | លោក វង់ សុខា | $ ៧០ |
| លោក ឡ ផេង | $ ១០០ | Mr. derick jwiee | $ ១០០ |
| លោក ម៉ុយ ឡេង និងអ្នកស្រី ស៊ីម | $ ១០០ | លោក សេង ត្រី និង សេង ឡាយ ព្រមទាំងកូន | $ ២០០ |
| លោក សុវណ្ណ | $ ១០០ | | |
| លោក សាបាន និងអ្នកស្រី បុប្ផា | $ ១០០ | លោក ដេ វីត | $ ៦០ |
| លោក សុខ សារឿន | $ ១០០ | លោក ដា វីតសុង | $ ១០០ |
| លោក យ៉ុង និងអ្នកស្រី ហៀង | $ ១០០ | លោកស្រី អ៊ឹម សុមាលី | $ ១៥០ |
| លោក អា មុត | $ ៥០ | សុខយ៉ា | $ ២០ |
| លោក សារ៉េត | $ ១០០ | ឡាច សុផល | $ ៥០ |
| លោក ងួន សុខវេង | $ ៣០ | អ៊ុន ធឿត | $ ៥០ |
| លោក ធនទី និងភរិយា | $ ៤០ | ពេជ ឆ្ងួយ | $ ៥០ |
| លោក ពិច ឆ្ងួយ | $ ១០ | សួន ឆុន | $ ២០ |




**បន្ថែម** កម្មវិធីប្រមូលថវិការនេះមិនទាន់បានបញ្ចប់នៅឡើយទេ ប្រសិនបើលោក លោកស្រី អ្នកនាងកញ្ញា មានបំណងជួយដល់កងទ័ពខ្មែរ ទោះតិច ឬច្រើនក្តី គណៈកម្មាធិការយើងខ្ញុំនៅរង់ចាំទទួលគ្រប់ពេលវេលា ។ **សូមទំនាក់ទំនងមក**ប្រធានគណៈកម្មាធិការ លោក សៀកសាន់ទី សែម តាមរយៈទូរស័ព្ទលេខ : **( 267 ) 273 5771**

ពេលវេលា និងម៉ោងផ្សាយកម្មវិធីជាភាសាខ្មែរ
តាមរយៈស្ថានីយ៍ទូរទស្សន៍ប៉ុស្តិ៍លេខ ៨ ក្រុងឡូវែល រដ្ឋម៉ាសាឈូសេត

| ថ្ងៃ Date | ឈ្មោះកម្មវិធី Program | ម៉ោង Time | រយៈពេល Duration |
|---|---|---|---|
| ថ្ងៃច័ន្ទ Monday | ប្រពៃណីខ្មែរ | 12:00 PM | 01:00:00 |
| | សម្លេងខ្មែរ-អាមេរិកាំង | 08:00 PM | 01:00:00 |
| | ជីវិតថ្មី Jivit Thmei | 09:00 PM | 01:00:00 |
| ថ្ងៃអង្គារ Tuesday | ខ្មែរក្រុងឡូវែល | 12:00 PM | 00:30:00 |
| | ខ្មែរភៀសខ្លួន Khmer Refugee | 06:00 PM | 01:00:00 |
| | ជីវិត និង សិល្ប: Life and Arts | 07:00 PM | 01:00:00 00:30:00 |
| ថ្ងៃពុធ Wednesday | សមាគមខ្មែរ CMAA TV Show | 07:00 PM | 01:00:00 |
| | មនោសញ្ចេតនាខ្មែរ | 08:00 PM | 01:00:00 |
| ថ្ងៃព្រហស្បតិ៍ Thursday | បុណ្យអុំទូក | 07:00 PM | 01:00:00 |
| | នាទីសង្គមខ្មែរ | 08:00 PM | 01:00:00 |
| ថ្ងៃសុក្រ Friday | ព្រះពុទ្ធសាសនាខ្មែរ | 12:00 PM | 01:00:00 |
| | Khmer Charisma Live | 05:00 PM | 01:00:00 |
| | ព័ត៌មានវត្ត Temple News | 08:00 PM | 01:00:00 |
| ថ្ងៃសៅរ៍ Saturday | Cambodian Baptist | 03:00 PM | 01:00:00 |
| ថ្ងៃអាទិត្យ Sunday | ដំណើរទៅស្រុកខ្មែរ | 06:00 PM | 01:00:00 |

ពេលវេលា និងម៉ោង ផ្សាយកម្មវិធីជាភាសាខ្មែរ
តាមរយៈស្ថានីយ៍ទូរទស្សន៍ប៉ុស្តិ៍លេខ ៩៥ ក្រុងឡូវែល រដ្ឋម៉ាសាឈូសេត

| ថ្ងៃ Date | ឈ្មោះកម្មវិធី Program | ម៉ោង Time | រយៈពេល Duration |
|---|---|---|---|
| ថ្ងៃច័ន្ទ Monday | Cambodian Baptist | 09:00 AM | 01:00:00 |
| | ខ្មែរភៀសខ្លួន Khmer Refugee | 07:00 PM | 01:00:00 |
| ថ្ងៃអង្គារ Tuesday | ប្រពៃណីខ្មែរ Khmer Tradition | 12:00 PM | 01:00:00 |
| | Khmer Charisma | 03:00 PM | 01:00:00 |
| ថ្ងៃព្រហស្បតិ៍ Thursday | ព័ត៌មានវត្ត Temple News | 08:00 PM | 01:00:00 |
| ថ្ងៃសុក្រ Friday | ដំណើរទៅស្រុកខ្មែរ | 02:00 PM | 01:00:00 |
| | ជីវិតថ្មី Jivit Thmei | 07:00 PM | 01:00:00 |
| | មនោសញ្ចេតនាខ្មែរ | 08:00 PM | 01:00:00 |
| ថ្ងៃសៅរ៍ Saturday | ព្រះពុទ្ធសាសនាខ្មែរ | 03:00 PM | 01:00:00 |
| | ខ្មែរក្រុងឡូវែល Khmer Lowell | 04:00 PM | 01:00:00 |
| ថ្ងៃអាទិត្យ Sunday | នាទីសង្គមខ្មែរ Khmer Talk | 12:00 PM | 01:00:00 |
| | សមាគមខ្មែរ CMAA TV Show | 01:00 PM | 01:00:00 |
| | បុណ្យអុំទូក | 05:00 PM | 01:00:00 |
| | ជីវិត និងសិល្ប: Life and Arts | 06:00 PM | 00:30:00 |
| | សម្លេងខ្មែរ-អាមេរិកាំង | 07:00 PM | 01:00:00 |

ពេលវេលា និងម៉ោងផ្សាយកម្មវិធីជាភាសាខ្មែរ
តាមរយៈវិទ្យុ **WUML - 91.5 FM** ក្រុងឡូវែល រដ្ឋម៉ាស្សាឈូសេត

| វិទ្យុសំឡេងកុលបុត្រខ្មែរ Voice of Cambodian Children | វិទ្យុសំឡេងសមាគមខ្មែរ Voice of CMAA-Thinking Out Loud Radio |
|---|---|
| ផ្សាយរាល់ថ្ងៃអាទិត្យ ម៉ោង១រសៀល ដល់ម៉ោង៥ល្ងាច | ផ្សាយរាល់ថ្ងៃសុក្រ ម៉ោង១១ព្រឹក ដល់ម៉ោង១២ថ្ងៃត្រង់ |

*Continued from page 03*

## Barriers that prevent Cambodian-American

with structure, discipline, responsibility as a citizen, sportsmanship, and to increase personal and social skills, and in some cases mental toughness in your children.9. With your and the school support your children will reach the best potential and will succeed in their learning.

10. Important contacts all parents/guardians should have available are the City Public School main Administrative contacts with Telephone numbers and address.

**For the Lowell Public School:**
Rogers School
Superintendent: Dr. Chris Scott, Ph.D.
43 Highland Street Lowell, Ma 01852
Tel. (978) 674-4320
Family Resource Center:
Tel. (978) 674-4320 (same address)

**For the Revere Public School:**
Revere High School
Superintendent: Dr. Paul Dakin, Ph.D.
101 School Street Revere, Ma 02151
Tel. (781) 286-8226

**Parent Information Center :**
Tel. (781) 485-8453 (Same address)

**For the Lynn Public School:**
The Lynn School Department
Superintendent: Dr. Catherine C. Latham, Ph.D.
90 Commercial Street Lynn, Ma 01905
Tel. (781) 593-1680
**Parent Information Center:**
Tel. (781) 592-8796 (Same address)



Remember, schools are happy to work with you. They are on both of your and your children's team. Their intention is to see their students/pupils perform well in their school. Parents should not hold only the schools/teachers responsible for their children school performance and education. Parents have the right to and should take an active role in advocating for their children's best interest in education when necessary. Team work always proved to bring better result.Contact: Audria Chea, Audriac@hotmail.comKhmer Post # 201004

(Continued from page 01 )

# Cambodian-Americans...

ជាមួយនឹងអត្ថបទជាភាសាអង់គ្លេសរបស់នាង ។ អត្ថបទបានបង្ហាញជូនពីចំនួនមនុស្សក្នុងសហគមន៍មានប្រមាណ ២៥.០០០នាក់នៅឡូវែល ប្រមាណ ១៥.០០០នាក់ នៅលីន និងប្រមាណ ១៣.០០០នាក់នៅរីវៀ ដែលជាតំបន់ជាប់ៗ បូកសរុបបានពលរដ្ឋសហគមន៍ខ្មែរជាង៥៥.០០០នាក់ ដែលមានសមត្ថភាពប្រកួតប្រជែងមុខជំនាញក្នុងការងារជានយោជិកជាអ្នកជំនាញការ ជាម្ចាស់នៃពាណិជ្ជកម្មតូច ឬមធ្យម ហើយមកទល់នឹងពេលនេះ ជាសហគមនដែលមានការចាប់អារម្មណ៍លើវិស័យនយោបាយសង្គមតិចតួច។

ទៅបោះឆ្នោតគឺជាកាជ្រើសរើសអ្នកនយោបាយឱ្យទៅការពារផលប្រយោជន៍ពិតប្រាកដរបស់ខ្លួនឯង។ បើខ្មែរចំនួនដ៏ច្រើននេះចេះជ្រើសរើសដោយប្រុងប្រយ័ត្ន ដោយចេះតថ្លៃ ដោយមិនរាយមាយ (មិនឈិនឆៃ) ឆ្នោតរបស់អ្នកទាំងនោះនឹងក្លាយទៅជាអំណាចរបស់សហគមន៍ ភាពរីកចំរើននៃគ្រួសារ និងភាពរីករាយក្នុងវប្បធម៌មួយ ដែលធ្លាប់រុងរឿងបាន ពីព្រោះអ្នកដែលនឹងជាប់ឆ្នោតដោយសារលោកអ្នកនឹងធ្វើការងារគ្រប់គ្រងស្របទៅនឹងបំណងត្រូវការរបស់លោកអ្នក ដោយប្រុងប្រយ័ត្នដូចគ្នា។

programs, cultural competent medical care and clinic, cultural competent media access through television programs and radio, civic awareness and education, Cambodian Mutual Assistance Association (CMAA), and this year, the Khmer Post New-spaper made available in both Khmer and English.

With an estimation of nearly 25,000 Cambodian-American living in this industrial community, the largest city, with the largest immigration population in the 5th district, it is very clear there is great number of potential voters.

Lynn, like Lowell also is an industrial community with an estimated of 15,000 Cambodian-American living here, per Mr. Sokheang Hong, former staff of Cambodian Community of Massachusetts (CCM) from 1986-2003. He currently is working for Massachusetts Rehabilitation Commission (MRC) and is active in the Lynn community. Also Mr. Hong estimated "at least half of the total estimated population is potential voters".

Lynn has cultural competent providers in both medical and mental health cares and clinics at Lynn Community Health Center (LCHC). Cambodian-American who live in this city scattered throughout the city. Most businesses own by the Cambodian-American can be found on Western Avenue also known as Rt. 107, Com-mercial Street, and several others spread out in different part of the city. Most businesses include grocery stores, restaurants, and liquor stores. The biggest gathering for all cultural and religious events held at the Buddhist Temple, Wat Sangkhikaram in Lynn.

Revere is located in the Metro-Boston area with an easy access to Boston though the Massachusetts Bay Transportation Authority (MBTA), Buses and Blue-line Train. Revere has specialized Southeast Asian Clinic through North Suffolk Mental Health Association (NSMHA) Inc. This clinic has cultural competent staffs providing mental health services to the Cambodian from Revere, Lynn, Boston, and Metro-Boston cities. Massachusetts General Hospital (MGH) Revere also has numbers of cultural competent interpreters on staff to serve Cambodian patients from Lynn, Revere, and cities nearby. Revere also has a busy and most peaceful Buddhist Center, Wat Ratanrangsi/Revere Buddhist Community Inc., on Thornton Street, off of Shirley Avenue that keeps residents in the community, city, and nearby cities very busy and involved.

Cambodian-American who settled in this city as early as 1981, monopolized businesses along Shirley Avenue in ward 3 part of Revere. All businesses own by the Cambodian-American vary from grocery stores to restaurant, liquor store, Laundromat, video to jewelry shop, social club, hair /beauty salons, and Chiropractor clinics managed by Cambodian-American. Mr. Mong Keo, a long time resident and business owner in Revere reported, "There is about 13,000 Cambodian living in Revere." The Revere City profile reported about 11,000 Cambodian living in Revere. This number of cause may be under count. Mr. Keo also stated, "Cambodian-American in Revere are active voters in the past few years, as more become naturalized as U.S. citizens and qualify voters."

As evidence by the potentials in businesses that bring a great deal of revenue in tax money for your city, the power of your VOTE as qualify and valued voters you can vote for candidates who is best represent your and your community's needs. You have the right to hold your candidates accountable for what they declare to do to represent your needs as their constituents.

# នយោបាយនៅកម្ពុជា

ដោយ : ពិន សំខុន

## ១០ឆ្នាំពន្ធនាគារសម្រាប់ សម រង្ស៊ី

តុលាការក្រុងភ្នំពេញបានគេឃើញកំហុស សម រង្ស៊ី តំណាងរាស្ត្រខ្មែរ ដែលកំពុងភៀសខ្លួននៅប្រទេសបារាំង ថា "បានប្រើឯកសារក្លែងក្លាយសំរាប់បញ្ជាក់ពីសកម្មភាពរបស់ខ្លួន" ។ នៅលើកំហុសនេះ តុលាការបានដាក់ទោសពន្ធនាគារ ១០ ឆ្នាំ និងបង់ពិន័យជាប្រាក់ ៥ លានរៀល និងសងជម្ងឺចិត្តចំពោះការខូចខាតសម្បត្តិរដ្ឋចំនួន ៦០លានរៀទៀត កាលពីថ្ងៃទី ២៣ កញ្ញាកន្លងទៅ ។ ទោសនេះបានបន្ថែមទៅលើទោសដែលតុលាការក្រុងស្វាយរៀង បានកាត់ទោសពីខែមករា ឆ្នាំ ២០១០ ឱ្យលោកតំណាងរាស្ត្រ មកពីគណបក្សប្រឆាំងរូបនេះ ជាប់ទោសពីរឆ្នាំរួចទៅហើយ ។



សម រង្ស៊ី ជួបជាមួយនឹងសមាជិកសភាកាណាដា នៅថ្ងៃទី០៦ តុលា ឆ្នាំ២០១០

ករណីដាក់ទោសទៅលើសមាជិកសភាខ្មែរទៅបានដោយសារសភាខ្មែរបានបោះឆ្នោតលើអភ័យឯសិទ្ធលោក សម រង្ស៊ី កាលពីថ្ងៃទី ១៦ ខែវិច្ឆិកា ឆ្នាំ២០០៩ ដោយសារបានដកបង្គោលដែលអាជ្ញាធរបានដាំជាព្រំប្រទល់ខ្មែរ-វៀតណាម នៅខេត្តស្វាយរៀង ។ បង្គោលដដែលនោះបានត្រូវអ្នកនាំពាក្យរដ្ឋាភិបាលទទួលស្គាល់ថា "បានភ័ន្តច្រឡំលើចំណុចដែលត្រូវដាំ" កាលពីខែកញ្ញា ឆ្នាំ២០១០នេះ តែ សម រង្ស៊ី ពុំបានទទួលនូវការលើកទោសវិញទេ ។

ក្នុងខណៈនេះ នៅសភាជាតិខ្មែរ មានសមាជិករបស់ខ្លួនចំនួនបីរូបកំពុងគ្មានអភ័យឯកសិទ្ធិតុលាការខ្មែរបានធ្វើការកាត់ទោសទៅតាមភស្តុតាងដែលមានការភ័ណ្ឌច្រឡំឱ្យ រីឯអ្នកដែលមានទោសសុទ្ធសឹងតែនៅក្នុងគណបក្សប្រឆាំងនឹងរដ្ឋាភិបាល ដែលសុទ្ធសឹងជាមូលហេតុដែលធ្វើឱ្យរបបប្រជាធិបតេយ្យនៅកម្ពុជាគាំងដំណើរ ។ លោក សម រង្ស៊ី បានប្តឹងទៅអង្គការសភាអន្តរជាតិ និងសហគមន៍ខ្មែរនៅក្រៅប្រទេសដើម្បីឱ្យជួយជួសជុលជម្ងឺប្រជាធិបតេយ្យនេះនៅកម្ពុជា ហើយបានធ្វើឱ្យមានការរំជើបរំជួល បណ្តាលឱ្យមានប្រតិកម្មជាលិខិតថ្កោលទោសរដ្ឋាភិបាលកម្ពុជានិងបាតុកម្មប្រឆាំងថ្នាក់ដឹកនាំខ្មែរ នយោបាយខ្មែរ ស្ទើរគ្រប់កន្លែងនៅឯនាយសមុទ្រ ។ ខួប៣០ឆ្នាំនៃសន្ធិសញ្ញាក្រុងប៉ារីសដែលបានផ្តល់សំណាងឱ្យកម្ពុជាក្លាយជាប្រទេសឯករាជ្យប្រជាធិបតេយ្យ ត្រូវបានអង្គការសិទ្ធិមនុស្ស អ.ស.ប នឹងសហគមន៍ខ្មែរទៅក្រៅប្រទេស រួមទាំងគណបក្សប្រឆាំងក្នុងស្រុកទាំងពីរ គឺគណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សទាមទារឱ្យជួសជុល ហើយលើកយកមកប្រើ ដើម្បីជាដំណោះស្រាយសម្រាប់កម្ពុជាឡើងវិញ ។ សភាប្រទេសសេរីជាច្រើនក៏ទាមទារឱ្យសន្ធិសិទក្រុងប៉ារីស ដែលមានសពលភាពឡើងវិញ តែរដ្ឋាភិបាលខ្មែរនៅតែព្រងើយចំពោះដំណោះស្រាយនេះ ។

លោក សម រង្ស៊ី មិនអាចចូលកម្ពុជាវិញបាន ដោយពុំមានជាប់ពន្ធនាគារបានត្រូវគេមើលឃើញថា "ការកាត់ទោសលើរូបលោក ករណីនយោបាយទប់ស្កាត់មិនឱ្យ សម រង្ស៊ី អាចរៀបចំចលនានៃការបោះឆ្នោតឱ្យគណបក្សលោកមានកម្លាំងបានទៅថ្ងៃមុខ " ដូច្នេះគណបក្សប្រជាជននឹងនៅតែជាគណបក្សកាន់អំណាចផ្តាច់មុខដោយសម្លេងពីរភាគបីលើកម្ពុជា មិនអាចផ្លាស់ប្តូរបានដដែល ៕

# ឌឹ ខេមបូឌា ដេលី The Cambodia Daily

## រដូវវស្សាយឺតយ៉ាវធ្វើឱ្យផលិតកម្មសូត្រធ្លាក់ចុះពាក់កណ្តាល

ដោយ Simon Marks

THE CAMBODIA DAILY

ផលិតកម្មសូត្រខ្មែរនឹងធ្លាក់ចុះប្រហែល៥០ភាគរយនៅក្នុងឆ្នាំនេះ ដោយសារតែរដូវវស្សាយឺតយ៉ាវ ដែលរាំងស្ទះដល់ដើមមន ដែលត្រូវគេប្រើ ដើម្បីចិញ្ចឹមដង្កូវនាងមិនឱ្យលូតលាស់លឿនទាន់ពេលវេលា នេះបើយោងតាមអ្នកចិញ្ចឹមដង្កូវនាង និងតម្បាញ ។

កម្រិតផ្គត់ផ្គង់កាន់តែទាបក៏បានធ្វើឱ្យតម្លៃឡើងខ្ពស់ផងដែរ គឺឡើងជាង៣០ភាគរយបើប្រៀបធៀបនឹងរយៈពេលដូចគ្នាកាលពីឆ្នាំមុន ។

លោក ហូ ចំណាប់ នាយកគ្រប់គ្រងផ្នែកទីផ្សាររបស់សមាគមភូមិសូត្រខ្មែរ ជាសមាគមតម្បាញសូត្រ និងចិញ្ចឹមដង្កូវនាងទូទាំងប្រទេស ដែលស្រង់ស្ថិតិពីឧស្សាហកម្មនេះ បានមានប្រសាសន៍ថា ផលិតកម្មសូត្រទូទាំងប្រទេសនៅដំណាច់ឆ្នាំនេះមានចន្លោះពីពីរទៅបីតោន បើធៀបទៅនឹងឆ្នាំមុនដែលផលិតសរុបបាន៥តោន ។

លោក ហូ ចំណាប់ បានមានប្រសាសន៍ថា "វត្ថុដើមមនមិនបានកើនឡើងទេនៅក្នុងឆ្នាំនេះ ដោយសារតែយើងមានបញ្ហាមួយចំនួនពាក់ព័ន្ធនឹងធាតុអាកាស" ។

លោកបានមានប្រសាសន៍ថា រដូវវស្សាយឺតជាងធម្មតានេះ មានន័យថា អ្នកផលិតសូត្រអាចដាំដើមមនបានតែក្នុងអំឡុងខែមិថុនា និងខែកក្កដាប៉ុណ្ណោះ គឺខុសពីធម្មតាដែលអាចដាំបានក្នុងខែមេសា និងខែឧសភា ។ លោកបានបន្ថែមថា ស្ទើរតែទាំងអស់នៃអ្នកចិញ្ចឹមដង្កូវនាងចំនួន៧០០នាក់របស់សមាគមនេះបានទទួលរងផលប៉ះពាល់ ។

ប៉ុន្តែត្រូវការខ្ពស់ពីអ្នកផលិតក្នុងប្រទេស និងអ្នកទិញនៅក្រៅប្រទេសបានធ្វើឱ្យតម្លៃសូត្រឆៅមានការកើនឡើងពី៣០ដុល្លារក្នុងមួយគីឡូក្រាមដល់៤០ដុល្លារក្នុងមួយគីឡូក្រាមពេលបច្ចុប្បន្ន ។

ក្រុមអ្នកជំនាញបាននិយាយថា តម្រូវការសូត្រពណ៌មាសរបស់ខ្មែរដែលជាទូទៅគេជឿថាមានគុណភាពខ្ពស់ជាងសូត្រពណ៌សដែលផលិតនៅក្នុងប្រទេសចិន វៀតណាម និងថៃនោះ គឺមានចំនួនជាង៤០០តោនក្នុងមួយឆ្នាំ ជាចំនួនដែលកម្ពុជាត្រូវនាំចូលក្នុងពេលបច្ចុប្បន្នដើម្បីឆ្លើងតបទៅនឹងតម្រូវការនៃអ្នកផលិតសូត្ររបស់ខ្លួន ។

អ្នកស្រី Catheine Theron ជាម្ចាស់ និងជាអ្នករចនាម៉ូតរបស់ហាង Kashaya Silk ជាហាងមួយដែលលក់សិប្បកម្មសូត្រខ្មែរក្នុងទីក្រុងភ្នំពេញ បានមានប្រសាសន៍ថា ថ្វីបើហាងរបស់អ្នកស្រីមិនរងផលប៉ះពាល់ដោយសារការធ្លាក់ចុះក្នុងផលិតកម្មនេះ ដោយសារតែអ្នកស្រីមានមជ្ឈមណ្ឌលត្បាញសូត្រផ្ទាល់ខ្លួនក៏ដោយ ក៏កម្រិតផលិតកម្មមិនសូវល្អជាបន្ទុកដ៏ធំមួយសម្រាប់អ្នកទិញដែរ ។

ប៉ុន្តែនៅក្នុងឧស្សាហកម្មមួយដែលប្រើប្រាស់វិធីសាស្ត្របុរាណ ដែលជារឿយៗខ្វះខ្នាយពេលវេលា ហើយអាស្រ័យទៅលើអាកាសធាតុនោះ ការបង្កើនការផលិតមិនងាយស្រួលធ្វើដូចការនិយាយនោះទេ ។

ក្នុងប្រទេសកម្ពុជា សូត្រត្រូវបានគេផលិតដោយដៃ ហើយផលិតដោយគ្មានជាតិគីមី ប៉ុន្តែនៅក្នុងប្រទេសចិន ប្រទេសវៀតណាម និងប្រទេសថៃ ផលិតកម្មសូត្រមានលក្ខណៈឧស្សាហកម្មច្រើនជាង ហើយមានប្រើប្រាស់ជាតិគីមី ។

អ្នកស្រី Theron បានមានប្រសាសន៍ថា "ជួនកាលមានភ្លៀងធ្លាក់មិនគ្រប់គ្រាន់ ហើយជួនកាលស្លឹកមនរងការប៉ះពាល់ពីជម្ងឺទៀត" ។ សូត្រដ៏ល្អបំផុតគឺសូត្រខ្មែរ ។ ប៉ុន្តែការផលិតគឺមានការខ្វះខាតខ្លាំងណាស់ ហើយវាកាន់តែខ្លាំងឡើងៗ" ។



លទ្ធផលចុងក្រោយគឺថា ប្រទេសកម្ពុជាអាចប្រកួតប្រជែងខាងគុណភាពបាន ប៉ុន្តែមិនអាចប្រកួតប្រជែងជាមួយប្រទេសមួយចំនួនដែលផលិតសូត្រជាលក្ខណៈទ្រង់ទ្រាយធំនៅលើទីផ្សារអន្តរជាតិនោះទេ ។

ថ្វីបើឧស្សាហកម្មនេះត្រូវប្រឈមនឹងកម្រិតផលិតកម្មមិនសូវល្អ និងកម្រិតវិនិយោគទាបក៏ដោយ ក៏ការលក់ក្នុងចំណោមអ្នកតម្បាញនានាដែលបង្កើតបានជាភូមិសូត្រខ្មែរ មានការកើនឡើងប្រហែល១០ភាគរយដល់ជិតមួយតោនរហូតមកដល់ពេលនេះនៃឆ្នាំនេះ ។

លោក ហូ ចំណាប់ បានមានប្រសាសន៍ថា ផលិតកម្មសូត្រមានការធ្លាក់ចុះ "ប៉ុន្តែមានមនុស្សច្រើនណាស់ដែលចង់ប្រើប្រាស់សូត្រ" ។ លោកបានបន្ថែមថា អ្នកតម្បាញសូត្របានចាប់ផ្តើមលក់វត្ថុធាតុដើមតិចជាងមុន ហើយលក់ផលិតផលសម្រេច កាន់តែច្រើនជាងមុន ដូចជាកាបូប និងសំលៀកបំពាក់ជាដើម ។

ទោះជាយ៉ាងណា វិស័យនេះនៅតែត្រូវការយ៉ាងខ្លាំងនូវការវិនិយោគជាលក្ខណៈឯកជនដោយទឹកប្រាក់ភាគច្រើនត្រូវ ដែលបានបញ្ចូនទៅក្នុងវិស័យនេះបានមកពីសហគមន៍ត្បាញសូត្រនេះខ្លួនឯងតែប៉ុណ្ណោះ ។

កាលពីសប្តាហ៍មុន ក្រុមហ៊ុនពាណិជ្ជកម្មដែលមានមូលដ្ឋាននៅក្រុងហុងកុង គឺក្រុមហ៊ុន Wana International Group ដែលផ្គត់ផ្គង់ដល់ហាង Wal-Mart នៅក្នុងសហរដ្ឋអាមេរិក បានបញ្ជាទិញក្រមា និងកាបូបសូត្រ ដែលមានប្រភពពីអ្នកផ្គត់ផ្គង់ចំនួន៥ នៅទីក្រុងភ្នំពេញ និងខេត្តកណ្តាលក្នុងទឹកប្រាក់២.០០០ ជាមួយនឹងមជ្ឈមណ្ឌលសេវាកម្មនាំចេញកម្ពុជា ។

ការបញ្ជាទិញនេះមានចំនួនតិចតួចមែន ប៉ុន្តែយ៉ាងហោចណាស់ក៏វាជាសញ្ញាមួយដែលបង្ហាញថា ការនាំចេញសូត្រកំពុងចាប់ផ្តើមមានភាពសំបូរបែបជាងការនាំចេញរបស់ហាងលក់ផលិតផលថ្លៃៗមួយចំនួនដែលរកស៊ីជាមួយអតិថជនអន្តរជាតិដែរ ។

អ្នកស្រី ហេង គន្ធី ជានាយកគ្រប់គ្រងផ្នែកនាំចេញនៅក្នុងប្រទេសកម្ពុជាសម្រាប់អង្គការ The Kearny Alliance ជាអង្គការពាណិជ្ជកម្មអន្តរជាតិមួយដែលរួមមានមជ្ឈមណ្ឌលសេវាកម្មនាំចេញ (Export Service Center) ក្នុងចំណោមសមាជិករបស់ខ្លួនបានមានប្រសាសន៍ថា "យើងនៅក្នុងដំណាក់កាលដំបូងនៅឡើយ" ។

អង្គការ The Kearny Alliance ក៏នឹងបង្ហាញនូវផលិតផលសូត្រខ្មែរនៅពិព័រណ៍ China Sourcing Fair នៅក្នុងក្រុងហុងកុង នាចុងខែនេះដើម្បីទាក់ទាញអតិថិជនថ្មីៗផងដែរ ។

អ្នកស្រីម ហេង គន្ធី បានមានប្រសាសន៍ថា "នៅឯពិព័រណ៍នេះ យើងនឹងសំឡឹងរកអតិថិជនដែលមិនសូវជាធំដុំ ដោយសារតែសមត្ថភាពរបស់យើងនៅទីនេះនៅមានកម្រិត ដូច្នេះយើងចង់បានអតិថិជនខ្នាតតូច ឬមធ្យមច្រើនជាង" ។

អង្គការស្បៀងអាហារ និងកសិកម្មរបស់អង្គការសហប្រជាជាតិកំពុងតែជួយផ្តល់មូលនិធិដល់ការអភិវឌ្ឍវិស័យសូត្រនេះផងដែរ ។

កាលពីឆ្នាំមុនទីភ្នាក់ងារនេះបានផ្តល់ហិរញ្ញប្បទានដល់គម្រោងមួយដែលមានទឹកប្រាក់ ៤៧៥.០០០ដុល្លារ ដើម្បីសហការជាមួយរដ្ឋាភិបាល ដើម្បីបង្កើតមជ្ឈមណ្ឌលផលិតកម្មសម្រាប់ពងដង្កូវនាង ព្រមទាំងកសិដ្ឋានសម្រាប់បង្ហាញចំនួន៧កន្លែង ដែលកំពុងត្រូវបានបង្កើតឡើងដើម្បីបណ្តុះបណ្តាលដល់ប្រជាជនក្នុងមុលដ្ឋានអំពីការចិញ្ចឹមដង្កូវនាង ។

ព្រះអង្គម្ចាស់ ស៊ីសុវត្ថិ ភានុរ័ត្ន ទីប្រឹក្សាបច្ចេកទេសជាន់ខ្ពស់របស់មជ្ឈមណ្ឌលពាណិជ្ជកម្មអន្តរជាតិ ក្នុងប្រទេសកម្ពុជាបានសហការជាមួយនឹងក្រសួងពាណិជ្ជកម្មតាំងពីឆ្នាំ២០០៧មក ដោយបង្កើតគោលនយោបាយក្នុងការបង្កាត់ដង្កូវនាង តម្បាញ និងទីផ្សារនោះបានមានបន្ទូលថា "បញ្ហាសំខាន់គឺកង្វះផលិតកម្មអំបោះសូត្រ" ។

ព្រះអង្គម្ចាស់ ស៊ីសុវត្ថិ ភានុរ័ត្ន បានមានបន្ទូលថាផលិតកម្មសូត្រក្នុងប្រទេសនឹងធ្លាក់ចុះមកនៅត្រឹមចន្លោះពីពីរទៅបីតោនក្នុងឆ្នាំនេះ ។ ព្រះអង្គម្ចាស់ ស៊ីសុវត្ថិ ភានុរ័ត្ន បានមានបន្ទូលថា ទ្រង់នឹងបញ្ចុះបញ្ចូលរដ្ឋាភិបាលឱ្យបង្កើតក្រុមប្រឹក្សាសូត្រមួយដែលមានសមាជិកមកពីទាំងវិស័យរដ្ឋ និងឯកជន ។

ព្រះអង្គបានមានបន្ទូលថា ការបង្កើតក្រុមប្រឹក្សាស្រដៀងគ្នានេះនៅទីក្រុង Bangalore ក្នុងប្រទេសឥណ្ឌា បានជួយបង្កើនកម្រិតផលិតកម្មក៏ដូចជាការនាំចេញរួចទៅហើយ ។

ព្រះអង្គម្ចាស់បានមានបន្ទូលថា "យើងត្រូវការកម្លាំងថែមទៀតពីសហគមន៍អន្តរជាតិ និងជាពិសេស គឺជាការវិនិយោគជាលក្ខណៈឯកជន ។ ក្រុមប្រឹក្សាសូត្រនេះ នឹងក្លាយជាស្ថាប័នប្រពៃបំផុតមួយសម្រាប់វិស័យនេះទាំងមូលទាក់ទិននឹងគោលនយោបាយការវិនិយោគ និងការស្រាវជ្រាវ" ។

ព្រះអង្គម្ចាស់បានមានបន្ទូលថា បើទោះណាជាតម្លៃដើមខ្ពស់ជាងនោះក៏ដោយ ក៏ការវិនិយោគទៅលើការដាំដើមមនលើផ្ទៃដីមួយហិកតាដែលផ្តល់ប្រាក់ចំណេញដែលបានមកពីសូត្រប្រហែល ២.០០០ដុល្លារដែរ បើធៀបទៅនឹងការស្ទូងស្រូវក្នុងផ្ទៃដីមួយហិកតាដែលផ្តល់ប្រាក់ចំណេញបានត្រឹមតែ៧០០ដុល្លារប៉ុណ្ណោះ ៕

# ស្ត្រីខ្មែរដំបូងបង្អស់ដែលបានធ្វើដំណើរពីប្រទេសបារាំងមកភ្នំពេញតាមផ្លូវគោក

**(តពីលេខមុន)**

**ដោយ : ពិន នារីពិទូ**

•••អ្នកទាំងពីរ (Sylvia និង Aurelie) បានធ្វើដំណើរតាមរថយន្តផ្ទាល់ខ្លួនមកដល់ Zamyn Uud ដែលស្ថិតនៅភាគខាងត្បូងឈាងខាងកើតប្រទេសម៉ុងហ្គោលី មានព្រំប្រទល់ជាប់ជាមួយប្រទេសចិន ដែលមានចំងាយសរុប២៥០០ គីឡូម៉ែត្រ តំបន់ជាយក្រុងនេះ គឺជាទីតាំងដ៏សំខាន់នៃស្ថានីយ៍អាយស្ម័យយាន និងផ្លូវគមនាគមន៍ក្រាលដោយថ្នល់កៅស៊ូយ៉ាងល្អប្រណិតតភ្ជាប់គ្នារវាងប្រទេសម៉ុងហ្គោលី និងប្រទេសចិន ដែលជាប្រភពដ៏សំខាន់ខាងផ្នែកគមនាគមន៍ ដឹកជញ្ជូន ពាណិជ្ជកម្ម និងជាពិសេសសំរាប់ភ្ញៀវទេសចរណ៍បរទេសដែលមានបំណងឆ្លងកាត់ព្រំដែនរវាងប្រទេសទាំងពីរ ។ នៅតាមព្រំដែនមានរថយន្តបន្តគ្នា ប្រជែងនាំមុខគ្នាដើម្បីឆ្លងដែន ប៉ុន្តែរថយន្តរបស់អ្នកទាំងពីរបែរជាបកត្រឡប់ក្រោយព្រោះមិនបានបង់ពន្ធរថយន្តពេលស្ថិតក្នុងប្រទេសម៉ុងហ្គោលី ជនជាតិម៉ុងហ្គោល បានជួយអ្នកទាំងពីរដើម្បីបង់ពន្ធរួចរាល់នៅធនាគារ ។ ដើម្បីបញ្ចៀសការស្ទះស្ទាញនៅតាមព្រំដែនពីប្រទេសម៉ុងហ្គោលីទៅប្រទេសចិន ជនបរទេសខ្លះដែលធ្វើដំណើរផ្សងព្រេងតាមតូចក្រយានរបស់ខ្លួនបានបន្តដំណើរតាមរថយន្តឈ្នួលចូលក្នុងប្រទេសចិនដោយសុវត្ថិភាព ។ អ្នកទាំងពីរ (Sylvia និង Aurelie) បានមកដល់ប៉ុស្តិ៍ទីពីរ ភ្នាក់ងារបានត្រួតពិនិត្យទៅលើលិខិតស្នាមពន្ធគយ និងលិខិតឆ្លងដែនយ៉ាងយកចិត្តទុកដាក់ចប់សព្វគ្រប់មិនមានបញ្ហាអ្វីឡើយ ប៉ុន្តែភ្នាក់ងារនៅទីនោះមិនអនុញ្ញាតិឱ្យពួកគេបន្តដំណើរទៅមុខបានដោយសារថ្ងៃនេះជាថ្ងៃឈប់សំរាករបស់ប្រជាជនក៏ដូចជាមន្ត្រីរាជការនៃជនជាតិចិន អ្នកទាំងពីរបានពន្យល់ទៅភ្នាក់ងារថា មិនអាចស្នាក់នៅក្នុងប្រទេសម៉ុហ្គោលីបន្តទេដោយសារទិដ្ឋាការអស់សុពលភាព បន្ទាប់មកភ្នាក់ងារនៅទីនោះបានប្រើប្រាស់ទូរស័ព្ទរបស់ពួកគេដើម្បីទាក់ទងទៅលោក វ៉ាង (Mr.wang) ដែលជាមគ្គុ-ទេសទ៍នៅតាមជាយដែន ដែលអ្នកទាំងពីរធ្លាប់បានទំនាក់ទំនងបន្ទាប់ពីការសន្ទនាអស់រយៈពេលយ៉ាងយូរ ភ្នាក់ងារនៅតាមព្រំដែននៅតែមិនអនុញ្ញាតិឱ្យបន្តដំណើរទៅមុខបាន ។ ពួកគេត្រូវវិលត្រឡប់ទៅប្រទេសម៉ុងហ្គោលីវិញ និងសំរេចចិត្តវិលមកព្រំដែនប្រទេសចិននៅថ្ងៃស្អែកពេលព្រឹកព្រហាមម៉ោង៨ ។ នេះជាឧបសគ្គមួយរបស់អ្នកទាំងពីរ ប៉ុន្តែពួកគេត្រូវតែវិលត្រឡប់ទៅសណ្ឋាគារនៃស្រុក Zamyn Uud វិញដោយការខកចិត្ត ហើយក៏ជាលើកទីពីរដែរ បន្ទាប់ពីមានបញ្ហានៅប្រទេសរុស្ស៊ី ដោយទិដ្ឋាការអស់សុពលភាពក្នុងការស្នាក់នៅប្រទេសម៉ុងហ្គោលីបន្ត ប៉ុន្តែនៅទីនេះអ្នកទាំងពីរមិនបានទទួលនូវលិខិតព្រមានអ្វីឡើយ ។

ព្រឹកថ្ងៃទី៦ ខែតុលា ឆ្នាំ២០០៦ ដោយសារការឆ្លងកាត់ព្រំដែននៃប្រទេសនីមួយៗមានការពិបាកទំនាក់ទំនងភាសាក៏ដូចជា លិខិតស្នាម និងការប្រាស្រ័យទាក់ទងជាមួយភ្នាក់ងារដែលពាក់ព័ន្ធនានា និងដើម្បីធានាឱ្យមានការធ្វើដំណើរឆ្លងកាត់ស្របច្បាប់ អ្នកទាំងពីបានជួលនូវសេវា Baikal ដែលបានផ្តត់ផ្គង់ក្នុងតំលៃ២០ ដុល្លារ ប្រហាក់ប្រហែលនឹងប្រាក់ខែពាក់កណ្តាលនៃជនជាតិមុងហ្គោលីខ្លះ រឺងថ្ងៃស្អែកត្រូវចេញដំណើរពីព្រឹកព្រលឹមដើម្បីទៅជួបជាមួយនាយកនៃការិយាល័យជនអន្តោប្រវេសន៍ មុនពេលទទួលបានការអនុញ្ញាតិឆ្លងកាត់ព្រំដែនប្រទេសម៉ុងហ្គោលីចូលទៅព្រំដែនប្រទេសចិន ។ បន្ទាប់ពីទទួលបានការបោះត្រាលើទិដ្ឋាការម្តងទៀតរួចរាល់ហើយពួកគេត្រូវបានអនុញ្ញាតិឱ្យឆ្លងកាត់ព្រំដែននៃប្រទេសចិន និងក្រោយពេលដែលពួកគេត្រូវបានជិះដោយឧស្ម័ននីត្រូហ្សែន ដើម្បីសំលាប់បាក់តេរី បន្ទាប់មកភ្នាក់ងារ Baikal ក៏បានត្រឡប់ទៅប្រទេសម៉ុងហ្គោលី វិញក្រោយពីបញ្ចប់ការងាររបស់ខ្លួន ។ លោក វ៉ាង (Wang) ដែលជាមគ្គុទេសបានបំពេញការងាររបស់ខ្លួនក្នុងពេលអ្នកទាំងពីរស្នាក់នៅប្រទេសចិន ។ រថយន្តបានកំពុងរត់នៅលើផ្លូវក្រាលកាស៊ូដ៏ទំនើបដែលរដ្ឋាភិ-បាលចិន ទើបសាងសង់ឡើងវិញក្នុងការបញ្ចៀសពីផ្លូវខ្សាច់ និងផ្លូវគ្រួសរដិបរដុប ។ ទស្សនីយភាពរបស់ប្រទេសម៉ុងហ្គោលី នៅជិតបង្ហើយដោយសារប្រទេសនេះមានព្រំប្រទល់ជាប់គ្នាជាមួយខេត្ត Datong ទេសភាពវាលខ្សាច់ពណ៌មាសដ៏ធំល្វឹងល្វើយ ហ្វូងសត្វចៀមនិងអ្នកគង្វាលចៀម និងផ្ទះស្បូវបែបបុរាណពីរទៅបីជាប់គ្នា ។ នៅចំងាយ ៦០ គីឡូម៉ែត្រពីខេត្ត ដាតុង Datong ប្រទេសចិន ទេសភាពមានការផ្លាស់ប្តូរដែលខុសពីទឹកដីនៅប្រទេសមុងហ្គោលី ដែលក្រាលទៅដោយវាលខ្សាច់ល្ហល្ហេវ កសិករកំពុងប្រមូលផលដំណាំក្នុងចំការរបស់ពួកគេ ព្រៃឈើប្រកបដោយពណ៌មាសនារដូវស្លឹកឈើជ្រុះបន្ទាប់ពីប្រមូលផលហើយ នៅតាមបណ្តោយផ្លូវបើកបរ ហើយក៏ជារដូវប្រារព្ធពិធីបុណ្យរបស់ជនជាតិចិន ។ គួររំលឹកដែរថា ក្នុងការធ្វើដំណើរផ្សងព្រេងនេះមិត្តភ័ក្តរបស់អ្នកទាំងពីរឈ្មោះ Anne and Jacques Collineau បានជួយឧបត្ថម្ភនូវថវិកាដល់ពួកគេនៅពេលត្រូវការចាំបាច់ ។

**(សូមរង់ចាំអានបន្តនៅលេខក្រោយទៀត)**




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន** (**តពីលេខមុន**)

•**២ តុលា** : ក្រុមមិនមែនកុម្មុយនិស្តនៃរដ្ឋាភិបាលសម្ព័ន្ធខ្មែរប្រជាធិបតេយ្យ បានត្អូញត្អែរពីការវាយប្រហារពីក្រុមខ្មែរក្រហមជារឿយៗ នៅញូយ៉ក សម្តេច សីហនុ ចោទប្រកាន់ចំពោះវៀតណាម ថាបានបញ្ជូនអណិកជនយួន ៦០ ម៉ឺននាក់ចូលកម្ពុជា ។

•**១១ តុលា** : អូស្ត្រាលីឈប់ទទួលយល់ព្រមចុះហត្ថលេខារួមលើគម្រោងដំណោះស្រាយបញ្ហាកម្ពុជា ដែលរៀបរៀងដោយសហគមន៍អាស៊ាន។

•**២០ តុលា** : រដ្ឋាភិបាលសម្ព័ន្ធកម្ពុជាប្រជាធិបតេយ្យ បានត្រូវទទួលស្គាល់ដោយប្រទេស ៩០ (កាលពីឆ្នាំ១៩៧៩បានតែ ៧១ទេ)។ ដោយសារចំនួននោះ សម្ព័ន្ធរដ្ឋាភិបាលអាចរកអាសនៈនៅអង្គការសហប្រជាជាតិបាន ។

•**២៧ តុលា** : មហាសន្និបាតពិភពលោកនៃអង្គការសហប្រជាជាតិ ទាមទារឱ្យមានការដកទ័ពវៀតណាមចេញពីកម្ពុជាជាបន្ទាន់ ដោយសម្លេងព្រម១០៥ប្រឆាំង២៣ នឹងអនុប្បវាទ។

•**១៥-២៧ ធ្នូ** : ប្រមុខនៃក្រុមប្រឆាំងនឹងវៀតណាមទាំងបីនាក់ គឺ សីហនុ, ខៀវ សំផន និង សឺន សាន បានជួបប្រជុំគ្នា និងប្រជុំជាមួយភាគីចិន ដើម្បីសម្រេច ប្រឹងប្រែងកុំឱ្យឈ្លោះគ្នាតទៅទៀត និងពង្រឹងសម្ព័ន្ធភាពឡើងវិញ។

•**២៦ ធ្នូ** : នៅប៉េកាំង ទ្រង់ រណឫទ្ធិ ជួបជាមួយនឹងអ្នកនិពន្ធ វ៉េស៊ីល ដឺប្រេ និងទីប្រឹក្សាប្រធានាធិបតី មីតេរ៉ង់ គេទាយថា អាចនឹងមានជំនួបយោធាបារាំងចំពោះកងទ័ព សីហនុនិយមពេលខាងមុខ ។

**ឆ្នាំ ១៩៨៤**

•**២៤ មករា** : ប្រជុំរដ្ឋាភិបាលកម្ពុជាប្រជាធិបតេយ្យនៅតំបន់ "អំពិល" បន្តដោយទស្សនកិច្ចសម្តេចនរោត្តមសីហនុ នៅភ្នំមាឡៃជំរំខ្មែរក្រហម។ នៅអំពិលជំរំរណសិរ្ស លោក សឺន សាន នឹងនៅ តាទុម ជំរំហ៊ុនស៊ិនប៊ិច។

•**៥ កុម្ភៈ** : សម្តេចសីហនុ ទៅធ្វើទស្សនកិច្ចនៅប្រទេសអាស៊ាន ដង្ហែរដោយ ប៉ែន ថុល ខាងរណសិរ្ស លោក សឺន សាន និង ឈន ហៃ ខាងខ្មែរក្រហម។

•**១១ កុម្ភៈ** : ក្រុមខ្មែរក្រហមបានបើកការប្រយុទ្ធដ៏ធំបង្អស់មួយ គិតចាប់តាំងពីឆ្នាំ ១៩៧៧ មកដើម្បីកាន់កាប់ចំណតយន្តហោះបាត់ដំបងដុតកំទេចនៅពាក់កណ្ដាលក្រុង - ឃ្លាំងរំសេវ និងឃ្លាំង សាំង។

•**២ មីនា** : កងកម្លាំងរដ្ឋាភិបាលកម្ពុជាប្រជាធិបតេយ្យវាយប្រហារលើចំណតយន្តហោះសៀម-រាប ។ អាជ្ញាធរក្រុងបាងកកបានហាមឃាត់អ្នកកាសែតឱ្យឈប់ប្រើពាក្យ "ខ្មែរក្រហម" សម្រាប់សំដៅរកក្រុម ប៉ុល ពត និង ខៀវ សំផន ។

•**១៧ មេសា** : ខៀវ សំផន និយាយនៅតូក្យូ ផ្តើមសង្កត់គោលការណ៍មិនមែនកុម្មុយនិស្តរបស់រដ្ឋាភិបាលកម្ពុជាប្រជាធិបតេយ្យ ។

•**២០ ឧសភា** : ប្រារព្ធ "ទិវាចងគំនុំ" លើកទី១ រៀបចំដោយរដ្ឋបាលកម្ពុជាប្រជាមានិត ដើម្បីជាការគោរពវិញ្ញាណក្ខ័ន្ធដល់ជនរងគ្រោះដោយរបប ប៉ុល ពត។

•**៣១ ឧសភា** : សម្តេច សីហនុ បានថ្លែងប្រាប់នាយករដ្ឋមន្ត្រីជប៉ុន ថាព្រះអង្គបានត្រៀមដឹកនាំរដ្ឋាភិបាលបណ្តោះអាសន្នមួយ ដែលមាន៤ភាគី ដើម្បីរៀបចំការបោះឆ្នោតសាកល។

•**១២ មិថុនា** : ចិនបានផ្តល់អាវុធធន់ធ្ងន់ដល់រដ្ឋាភិបាលកម្ពុជាប្រជាធិបតេយ្យ ។

•**១៤ មិថុនា** : កិច្ចព្រមព្រៀម ចិន និង តូក្យូ ស្តីពីការយល់ព្រមលើរូបមន្តដោះស្រាយទាំងមូលនៃទំនាស់នៅកម្ពុជា ។ ជប៉ុនគាំទ្រជំហរអាស៊ានដែលបានគាំទ្រដល់រដ្ឋាភិបាលកម្ពុជាប្រជាធិបតេយ្យ។

•**២០ មិថុនា** : យៀកណាមដកទ័ពជាលើកទី៣ (១០ម៉ឺននាក់)

•**៣-៦ កក្កដា** :ថ្នាក់ដឹកនាំទាំងបីរូបនៃរដ្ឋាភិបាលកម្ពុជាប្រជាធិបតេយ្យប្រជុំកំពូលនៅប៉េកាំង។

•**១១ កក្កដា** : សម្តេច សីហនុ ប្រកាសថាព្រះអង្គបានទទួលការគាំទ្រពីប៉េកាំង លើគំនិតចង់ឱ្យភាគីទាំងអស់នៃជម្លោះកម្ពុជា ចូលរួមដោះស្រាយ។

•**១៤ កក្កដា** : សីហនុ ផ្ញើរសារទៅ ខៀវ សំផន ថាព្រះអង្គនឹងបញ្ឈប់ការងារជាព្រះប្រមុខរដ្ឋតទៅទៀត បើក្រុមខ្មែរក្រហមមិនឈប់វាយប្រហារលើទ័ពសីហនុនិយមនោះទេ។

•**៨ កញ្ញា** : បន្ទាប់ពីបានជួបរដ្ឋាភិបាលអាស៊ានរួចមក ប្រធានសន្និសីទអន្តរជាតិ ស្តីពីកម្ពុជា បានប្រកាសថា " ហាណូយ បញ្ចូលជនវៀតណាម ៥០ ម៉ឺននាក់មកក្នុងកម្ពុជា។

(**តទៅលេខក្រោយ**)




# ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni Buddha

❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្ស៊ិត .អេ.លី
❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
❖ បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

**៩១-** ក្រោមពីនាយកឆន្ទៈ ថ្វាយបង្គំលាព្រះអង្គត្រឡប់ទៅនគរកបិលវត្ថុវិញ ដោយនាំទាំងគ្រឿងអលង្ការ និងសេះកណ្ឋកៈផងនោះ ព្រះសិទ្ធត្ថទ្រង់បានគង់នៅក្នុងព្រៃស្វាយមួយកន្លែងឈ្មោះ **អនុបិយ** ក្បែរឆ្នេរស្ទឹងអនោមាអស់៧ថ្ងៃ ពេលនោះព្រះអង្គស្តេចយាងទៅទិសខាងត្បូង ទៅកាន់ទីក្រុង **រាជគ្រឹះ** ជារាជធានីនៃនគរមគធៈ ព្រះមហាក្សត្រសោយរាជ្យនគរនោះព្រះនាមព្រះបាទ **ពិម្ពិសារ** ។ ក្នុងវេលាព្រឹកព្រះអង្គទ្រង់ជំរះព្រះកាយក្នុងស្ទឹងនៅក្បែររាជធានី រួចហើយព្រះអង្គទ្រង់ក៏និមន្តយាងចូលទៅក្នុងរាជធានី ដើម្បីបិណ្ឌបាតដូចសមណៈដទៃទៀតដែរ។ អ្នកក្រុងរាជគ្រឹះនាំគ្នាពិចពិលរមិលមើលនូវព្រះរាជដំណើរដ៏ស្រគត់ស្រគំ ថ្លៃថ្នូរ សមឥតបីផ្ទឹមនៃព្រះអង្គ និងថ្វាយប្រគេនដល់ព្រះអង្គនូវអាហារបិណ្ឌបាតដ៏ប្រណីតៗ។

**៩២-** ដោយទ្រង់បានចង្ហាន់បិណ្ឌបាត្រល្មមសម្រាប់មួយថ្ងៃហើយ ព្រះសិទ្ធត្ថទ្រង់ស្តេចយាងចេញពីក្រុងរាជគ្រឹះវិញ ឆ្ពោះទៅកាន់ញកភ្នំ **បណ្ឌវៈ** រួចព្រះអង្គទ្រង់ឆាន់ចង្ហាន់បិណ្ឌបាត្រនៅទីនោះ ។ ចាប់តាំងពីថ្ងៃដែលព្រះសិទ្ធត្ថជាអម្ចាស់ទ្រង់យាងនិមន្តចូលទៅបិណ្ឌបាត្រជាលើកដំបូងក្នុងរាជធានីមក ដំណឹងក៏លេចឮសុះសាយថា មានសមណៈមួយអង្គទ្រង់មានព្រះរូបឆោមល្អល្អះ មានព្រះអាការៈស្រគត់ស្រគំថ្លៃថ្នូរល្អឥតអ្វីផ្ទឹមបាន ទ្រង់មានការប្រព្រឹត្តប្រតិបត្តិដ៏ល្អប្រសើរ បានមកដល់រាជធានីនេះ ។ ដំណឹងនេះមិនស្ងាត់បាត់ក៏លេចឮរហូតដល់ព្រះរាជវាំង ។ ព្រះបាទពិម្ពិសារដោយទ្រង់បានជ្រាប់ដំណឹងនេះក៏ប្រើរាជបុត្រាឱ្យទៅស៊ើបអង្កេតស្ថានការណ៍នោះ ។ រួចព្រះរាជាទ្រង់បានដឹងថា សមណៈអង្គនេះជាព្រះរាជបុត្រនៃស្តេចនគរកបិលវត្ថុ ទ្រង់ជារជ្ជទាយាទគ្រប់គ្រងព្រះនគរ ព្រះអង្គស្តេចទ្រង់បានលះបង់នូវអ្វីៗសព្វយ៉ាងទាំងអស់មកបួសជាភិក្ខុ ដើម្បីស្វែងរកមធ្យោបាយរំដោះមនុស្សសត្វទាំងឡាយឱ្យរួចពីចាស់, ឈឺ, ស្លាប់ ។

**៩៣-** ដោយទ្រង់បានជ្រាបយ៉ាងនេះហើយ ព្រះបាទពិម្ពិសារទ្រង់បានយាងទៅកាន់ភ្នំបណ្ឌវ ហើយទ្រង់ថ្វាយបង្គំនិមន្តព្រះសិទ្ធត្ថឱ្យគង់ប្រថាប់ក្នុងរាជធានីរបស់ព្រះអង្គ ដើម្បីឱ្យងាយស្រួលសម្រាប់ព្រះមហាក្សត្រស្តេចថ្វាយប្រគេនចង្ហាន់ និងបរិក្ខារផងទាំងពួង ដែលចាំបាច់សម្រាប់ជីវិតរបស់ព្រះអង្គ។ ប៉ុន្តែព្រះសិទ្ធត្ថជាអង្គម្ចាស់ ទ្រង់មិនទទួលការនិមន្តនោះឡើយ ដោយទ្រង់មានព្រះបន្ទូលថា "ចំរើនពរអាត្មាមិនអាចគង់នៅតែមួយកន្លែងបានទេ ដរាបណាមិនទាន់បានសម្រេចគោលបំណង"។ ទ្រង់បានឮដូច្នេះ ព្រះបាទពិម្ពិសារក៏បានធ្វើបដិញ្ញា (ប្តេជ្ញា) ជាមួយព្រះសិទ្ធត្ថយ៉ាងដូច្នេះ ថានៅពេលណាបំណងប្រាថ្នារបស់ព្រះអង្គ គឺការត្រាស់ដឹងបានសម្រេចបរិបូរណ៍ហើយ សូមឱ្យព្រះអង្គទ្រង់យាងមករាជធានីនៃនគររាជគ្រឹះមុនគេ ដើម្បីសម្តែងធម៌ប្រោសព្រះបាទពិម្ពិសារ ព្រមទាំងប្រជារាស្ត្ររបស់ព្រះអង្គផង។

(**តទៅលេខក្រោយ**)

❖ Original Illuatration and Naration in Thai by Gunapayuta.
❖ Translation into English by A Lu.
❖ Coloring by Yann Fang Lee
❖ Translation into Khmer by Bhikkhu Kong Am.

**91**- After Chandaka left him to go back to Kapilavastu with the dress and Kanthaka, Siddhartha stayed for seven days in the mango grove of Anupiya, near the bank of the Anoma River, then the journeyed southward and came to Rajagrha, the capital of the country of Maga-dha, ruled by king Bimbisara. In the morning, he bathed in the stream near the city; then, like all sramanas, he entered the city to accept for food. The people of Rajagrha, noticing the distinguished appearance of Siddhartha, offered him their best food.



**92**- Having obtained his meal for the day, Siddhartha left Rajagrha, heading toward Pandava Hill, where he ate his food. Since the day that Siddhatha had first accepted offering of food in the city, the news had spread that a Sramana of distinguished appearance and of income parably grave and noble demeanour had arrived. This news also reached the palace. King Bimbisara, knowing of the presence of such a Sramana, sent his son to check out the situation. He discovered that this sramana was the prince of Kapilavastu, the successor to the throne, who had given un everything and become a bhikkhu in search of the means to liberate all mankind from the imprisonment of old age, sickness and death.



**93**- Having this knowledge, King Bimbisara went to Pandava Hill and invited Siddhartha to stay in his capital city, where it would be very convenient for the King to offer him food and all the necessities of life. But Siddhartha graciously declined the invitation, saying: "I cannot remain in one place before realizing my goal and aspiration." So King Bimbisara made an agreement with Siddhartha to the effect that when his aspiration of perfect enlightenment was realized. he would come first to the city of Rajagrha to instruct and enlighten King Bimbisara and his people. *(Continued After Issue)*

# លោក គឹម សុខា ក្នុងសម្មាធិ

(តពីលេខមុន)

ដោយ : ពិន សំខុន

**ពិន សំខុន** : ចុះនៅថ្ងៃបន្តបន្ទាប់ទៅទៀត?

**គឹម សុខា** : ថ្ងៃទី២ និងថ្ងៃទី៣ គឺវានៅសល់បន្តិចបន្តួចលើខ្លួនខ្ញុំ នៅសល់រហូតទល់ឥឡូវនេះ ឱ្យតែបិទភ្នែកក៏មានម៉ោទៀត នៅខ្លីទេ! វាម៉ោ វាបាត់ៗ... ពេលណាខ្ញុំនាំសតិ ខ្ញុំមកតាមក្រោយនេះ កខ្ញុំវាតឹងក្បាលខ្ញុំដូចគេ បូងសក់ទាញតឹងឡើងលើអីចឹង ទាញស្បែកក្បាលឡើងរឹក... ដោយសារតែយើងមានរឿងច្រើនពេកទៅណាំ... ដល់ថ្ងៃទី៥ហើយ លោកគ្រូមិនទាន់ប្រាប់ពីរឿងពិនិត្យមើលពីខាងក្នុងខ្លួននៅឡើយទេ គឺយើងប្រើសតិយើងពិនិត្យមើលខាងក្រៅ ហើយត្រូវពិនិត្យខាងក្នុងខ្លួនទៀត... ខ្លួនខ្ញុំៗ ចូលទៅពិនិត្យខាងក្នុងខ្លួនខ្ញុំតាំងតែពីថ្ងៃទី៦ម្លេះ... ខ្ញុំឥតដឹងថា ក្បួនគេធ្វើយ៉ាងដូច្នោះផងទេ តែខ្ញុំចង់សាកដោយខ្លួនឯង... ចូលទៅក្នុងមើលក្រពះមើលបេះដូងខ្ញុំ ស្រាប់តែខ្ញុំដឹងថា សាច់ពោះខ្ញុំសំប៉ែតជាប់ទៅនឹងខ្នងអស់រលីងដូចជាឥតមានអ្វីនៅចន្លោះនោះទេ... អាហ្នឹងគេធ្វើនៅថ្ងៃទី៨ រីឯខ្ញុំធ្វើនៅថ្ងៃទី៧... ខ្ញុំឥតបានរៀនផង តែមិនដឹងជាយ៉ាងម៉េចទៅធ្វើនៅថ្ងៃទី៧ ខ្ញុំខំពិនិត្យឱ្យវារត់តាមខួរឆ្អឹងខ្នង... វាមុកឡើងម៉ោដល់ក្បាលច្រាត! ច្រាតយ៉ាងខ្លាំង... មើលទៅរឿងខ្ញុំមានច្រើនវាចេញមក ហើយទំនងជាមាននៅច្រើនទៀត ។

**ពិន សំខុន** : តើការឥតពិសារបាយល្ងាចអ្វីៗ តើមានបញ្ហាដែរឬទេ?

**គឹម សុខា** : ឥតអ្វីទេ ! តែបញ្ហាញ៉ាំឥតឆ្ងាញ់ ពេលថ្ងៃត្រង់ ពេលព្រលឹមឥតអីទេ ខ្ញុំញ៉ាំបបរសរជាមួយឆៃពៅ ឬជាមួយទឹកស៊ីអ៊ីវខ្ញុំញ៉ាំបាន ប៉ុន្តែថ្ងៃទ្រង់ម្ហូបរបស់គេហ្នឹងញ៉ាំមិនកើតតែម្តង... ខ្ញុំខំប្រឹងញ៉ាំ ឬញ៉ាំផ្លែឈើ... ល្ងាចញ៉ាំផ្លែឈើបន្ថែម ឬទឹកសណ្តែកទៅអស់មានបញ្ហាហើយ... ល្ងាចខ្ញុំឥតមានបញ្ហាអ្វីទេ... សុខភាពខ្ញុំក៏ប្រសើរ ជាតិស្ករក្នុងឈាមក៏ធ្លាក់ចុះ ពេលធម្មតា ពេលព្រឹកជាតិស្ករខ្ញុំ ១១០ ទៅ ១៣០ ពេលញ៉ាំរួច ដល់ពេលមកធ្វើវិប្បសនា អង្គុយបាន៤ឬ៥ថ្ងៃ ជាតិស្ករក៏ចុះមកនៅត្រឹមតែ ៩៥ ជាធម្មតា... ហើយបើពេលបាយថ្ងៃត្រង់ ហើយពីមុន ១៨០ អង្គុយហើយនៅត្រឹម ១០៥ឬ ១១០ តែប៉ុណ្ណោះ... ។

**ពិន សំខុន** : ចុះកម្លាំងកំហែងយ៉ាងម៉េចដែរ?

**គឹម សុខា** : កម្លាំងនៅដដែល... តែជាតិស្ករវាចុះ... ខ្ញុំទៅហ្នឹង ខ្ញុំសាកឥតញ៉ាំថ្នាំដែលពេទ្យឱ្យ វាចុះដល់ប៉ុណ្ណឹងណាំ... ។

**ពិន សំខុន** : ឥឡូវនេះ មកដល់ផ្ទះវិញយ៉ាងម៉េចដែរ?

**គឹម សុខា** : ឥឡូវឡើងវិញហើយ ឡើងជិតដូចដើម ដោយសារយើងញ៉ាំបាយល្ងាច រឿងធំគឺញ៉ាំបាយល្ងាចហ្នឹងហើយ ញ៉ាំហើយគេង វាធ្វើឱ្យជាតិស្ករវាឡើង... ហើយខ្ញុំចង់ថា បើឥតមានការងារធំៗ ហើយច្រើននោះ ខ្ញុំគិតថាចង់ឥតបាយល្ងាចរហូតបាន... ។

**ពិន សំខុន** : តែគេអាចឥតពិសារបាយ ឥតពិសារសាច់បានដែរ... ។

**គឹម សុខា** : មករកបន្លែឱ្យច្រើនវិញ ។

**ពិន សំខុន** : ត្រឡប់មករឿងថា ត្រូវឈប់អង្គុយដើម្បីមកជួយជាតិ ឬមិនឈប់អ្វីនោះ តើលោកមានដំណោះស្រាយហើយឬនៅ?

**គឹម សុខា** : ដំណោះស្រាយ គឺនៅពេលដែលស្រុកមានបញ្ហាធ្ងន់ធ្ងរដូចជាពេលនេះ អ៊ីចឹងគឺខ្ញុំមិនត្រូវគិតពិតប្រយោជន៍ផ្ទាល់ខ្លួនខ្ញុំមុនទេ... ការពិតហើយយើងធ្វើឱ្យអ្នកដទៃដែរ តែយើងធ្វើដើម្បីរំដោះទុក្ខខ្លួនឯងមុនគេហើយ ព្រះក៏គិតប្រយោជន៍ខ្លួនឯងមុនគេ ទើបទៅជួយ



អ្នកដទៃ... ក្នុងកាលៈទេសៈនេះ ខ្ញុំយកព្រះធម៌ទៅជួយស្រុក គឺជួយឥតទាន់ទេ បើទោះជាខ្ញុំបានត្រាស់ដឹងក៏ដោយ... ដូច្នេះខ្ញុំត្រូវផ្ទុំគ្នា គឺធ្វើវិប្បសនាបណ្តើរធ្វើការជួយជាតិបណ្តើរ... លុះដល់ពេលណាមួយ ខ្ញុំមានវ័យល្មមបញ្ចប់ការងារស្រុកទេស ខ្ញុំនឹងទៅធ្វើវិប្បសនាពេញដៃពេញជើងតែម្តង... ដូចជាអាយុ៦៥ឬ៧០អីទៅ នៅពេលដែលខ្ញុំឈប់ទទួលបន្ទុកធំលើបញ្ហាប្រទេសជាតិហើយ ត្រូវគេដឹកនាំម្តងហើយ ខ្ញុំនឹងចាប់ផ្តើមធ្វើផ្លូវចិត្តឱ្យកាន់តែខ្លាំងជាងនេះ... ។

**ពិន សំខុន** : បើអ៊ីចឹងលោកកំពុងប្រកាន់យកទ្រឹស្តីថា "កម្ពុជាជារបស់លោករបស់ខ្មែរ ពុំអាចនរណាយកបានទេ" ដដែល... ខ្ញុំចង់ដឹងថា តើមានពេលណាទេ ដែលលោកគិតថា យកព្រះធម៌ទៅធ្វើសាកលភាវូបនីយកម្មនៅក្នុងតំបន់ ដោយគិតថា "មនុស្សទាំងអស់រកសន្តិភាពដោយការស្រឡាញ់គ្នា" ឬ "មនុស្សទាំងអស់មិនត្រូវប្រាថ្នានូវអ្វីដែលជាសម្បត្តិនៃអ្នកដទៃ..." ថ្វីត្បិតតែតាំងពីកំណើតមនុស្សមកការចង់បានចង់មាន ចង់សំខាន់នោះមាតាមកជាមួយកំណើតក៏ដោយក្តី?

**គឹម សុខា** : ការពិតយើងមានការលំបាកដែរ នៅក្នុងសង្គម... បើយើងចាប់ផ្តើមហើយ ហើយអ្នកដទៃមិនទាន់ចាប់ផ្តើមទេនោះ គឺយើងនឹងមានការលំបាក ហើយការអាចសម្រេចបាននោះ វាពុំងាយទេ ឧប្បមាថា យើងប្រកាន់ថា របស់យើង របស់អ្នក ហើយកុំលូកលាន់គ្នាទៅវិញទៅម៉ោ សម្រាប់យើងធ្វើបាន សម្រាប់គេមិនឈប់លូក... អ៊ីចឹងហើយការផ្សព្វផ្សាយនូវព្រះធម៌នេះ ធ្វើឱ្យខ្ញុំគិតថា ដើរតួជាអ្នកផ្សព្វផ្សាយ ឬជាអ្នកការពារជាតិ ត្រូវជ្រើសរើសយកមួយណា?

**ពិន សំខុន** : ខ្ញុំមានឃើញឧទាហរណ៍មួយចេញពីគណបក្សសិទ្ធិមនុស្ស នាពេលថ្មីៗចុងក្រោយនេះ សមាជិក ផែនស៊ីវេនា នាំគ្នាធ្វើពិធីជប់លៀងមួយដ៏ធំសម្រាប់ទទួលប្រធាន និងភរិយាប្រធានរបស់គេដោយគ្មានប្រាថ្នាចង់បានចំណេញពីគេ ឬក៏រកអ្វីផ្សេងសម្រាប់ខ្លួនឯងវិញ... ការនេះបានធ្វើឱ្យមានការពេញចិត្ត ហើយរួចសម្បាច់គ្នាយ៉ាងខ្លាំង... ម្លោះហើយលុយក៏រកបានចំណេញផ្សព្វផ្សាយការស្រឡាញ់ គ្នាក៏បានរីកធំ... លើកដំកើងប្រធាន និងភរិយាកិត្តិយសក៏បានប្រសើរ... ខ្ញុំចង់ប្រៀបធៀបរឿងនេះ ទៅនឹងវិធីការពារជាតិដោយប្រើព្រះធម៌ក្នុងទំហំធំមួយថា តើគេអាចប្រើបច្ចេកទេសវិប្បសនាហ្នឹង សម្រាប់ប្រជាពលរដ្ឋលើកដំកើងថា "ប្រទេសកម្ពុជា ជាប្រទេសរបស់ខ្ញុំ" ហើយប្រជាពលរដ្ឋជួបជុំគ្នាលើឧត្តមគតិមួយនោះ តើធ្វើទៅកើតឬទេ?

**គឹម សុខា** : ខ្ញុំថាវាប្រើពេលយូរ វាមិនអាចឱ្យយើងធ្វើបានភ្លាមទេ សូម្បីតែយើងផ្សាយពីគោលនយោបាយរបស់គណបក្សនីមួយៗនេះ ពេលផ្សាយក៏ពិបាកដែរ យើងផ្សាយព្រះធម៌មានមនុស្សច្រើនណាស់ជួយផ្សាយហើយ វាឥតមានគ្រោះថ្នាក់ដូចផ្សាយពីគោលនយោបាយនោះទេ វាងាយជាង វាសាកលជាង ឱ្យតែយើងសម្រេចចិត្តថាធ្វើ ខ្ញុំជឿថា អ្នកដឹកនាំហ្នឹងគួរទៅធ្វើមុនគេ ព្រះសង្ឃក៏ធ្វើមុនគេដែរ ហើយវត្តហ្នឹងក៏ត្រូវបង្កើតកន្លែងធ្វើវិប្បសនាឱ្យបានគ្រប់វត្ត ។

(សូមអានបន្តនៅលេខក្រោយ)

ទស្សន៍ទាយជោគជតារាសី

# ជោគជតារាសីលោកអ្នក ថ្ងៃទី២២ កញ្ញា - ០៤ តុលា ឆ្នាំ២០១០

**ឆ្នាំជូត : (ពង្សទេព្តាប្រុស ធាតុទឹក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចទទួលផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ីឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយ មិនថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺសមប្រកបតែទាំងអស់៕

**ឆ្នាំឆ្លូវ : ( ពង្សមនុស្សប្រុស ធាតុដី )**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ថ្វីត្បិតតែមានភោគផលចំណូលហូរចូលច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្តោងធំនោះដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ឱនឲ្យគ្នាទើបមិនអាចប្រេះឆាគ្នាបាន ៕

**ឆ្នាំខាល : ( ពង្សយក្សស្រី ធាតុឈើ )**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរំងាប់ចិត្តឲ្យបានត្រជាក់ ។ ចំពោះស្ត្រីភេទក្នុងរយៈពេលនេះមិនត្រូវនិយាយស្តីប៉ប៉ាច់ប៉ប៉ោចឥតបានការច្រើនពេកទេ ព្រោះរឿងរ៉ាវផ្សេងៗអាចកើតចេញពីពាក្យសម្តី ។ ក្នុងរយៈពេលនេះដែរ ចំពោះគូស្វាមីភរិយា ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកទីបីចូលជ្រៀត ជ្រែកនៅគ្រួសារ ៕

**ឆ្នាំថោះ : ( ពង្សមនុស្សស្រី ធាតុឈើ )**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះលោកអ្នកត្រូវរវៀសរវៃញាប់ជើងញាប់ដៃបន្តិច តែចូរកុំមានចិត្តលោភលន់ដោយចង់មានចង់បានឲ្យហួសប្រមាណពេកទេ ប្រយ័ត្នបែរជាកើតរឿងរ៉ាវអាចបង់ខាតលាភសក្ការៈវិញ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេល នេះមានសុភមង្គលល្អណាស់នៅក្នុងគ្រួសារ ៕

**ឆ្នាំរោង : (ពង្សទេព្តាប្រុស ធាតុមាស)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះបើមានរឿងជម្លោះកើតឡើង ចូរចេះអត់ធ្មត់ និងរំងាប់ចិត្តឲ្យបានត្រជាក់ដាច់ខាតមិនត្រូវតបតទាំងកំហឹងទល់នឹងកំហល់ឡើយ ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះ ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកក្រៅមកញុះញង់ ៕

**ឆ្នាំម្សាញ់ : (ពង្សមនុស្សប្រុស ធាតុភ្លើង)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ទោះបីជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វើប្រហែសឲ្យសោះ ជាពិសេសចំពោះអាជីវករ អ្នករកស៊ីជួញដូរមុននឹងទទួល ឬប្រគល់នូវមុខទំនិញសព្វសារពើ ចូរចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចប្រក្រតី៕

**ឆ្នាំមមី : (ពង្សទេព្តាស្រី ធាតុភ្លើង)**

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយ និងថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺសមប្រកបតែទាំងអស់ ព្រោះអាចរកផលកម្រៃបានច្រើនត្រឡប់ចូលផ្ទះ៕

**ឆ្នាំមមែ : (ពង្សទេព្តាស្រី ធាតុមាស)**

រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ លោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសមុនពេលចុះហត្ថលេខា ឬផ្តិតមេដៃលើលិខិតស្នាមផ្សេងៗ ចូរពិនិត្យល្អិតល្អន់ ប្រយ័ត្នបង់ខាតទ្រព្យច្រើន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ឱនឲ្យគ្នាទៅវិញទៅមក ទើបទទួលបានសេចក្តីសុខ ៕

**ឆ្នាំវក : (ពង្សយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ អ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ គឺនៅពេលទូទាត់បញ្ជីប្រាក់កាសផ្សេងៗ ចូរប្រយ័ត្នប្រយែងក្រែងមានការភ្លាំងភ្លាត់ អាចបង់ខាតទ្រព្យច្រើន និងអាចកើតមានរឿងក្តីក្តាំទៀតផង ។ ចំពោះអាជីវករអ្នករកស៊ីប្តូរប្រាក់ ឬលក់គ្រឿងអលង្ការផ្សេងៗ ចូរមានការប្រយ័ត្នប្រយែងក្រែងមានជនទិលខូចលួច បន្លំភ្នែកស្រស់ៗ ៕

**ឆ្នាំរកា : (ពង្សយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកល្អធម្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែលោកអ្នកអាចរកផលចំណូលបានច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក គឺបានត្រឹមតែចំណាយកម្លាំង និងពេលវេលាឥតអំពើតែប៉ុណ្ណោះ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ បើស្រលាញ់កុំទៅញឹក បើរលឹកកុំទៅញយ ទើបចំណងស្នេហ៍អាចគង់វង្សបានយូរអង្វែង ៕

**ឆ្នាំច : ( ពង្សយក្សស្រី ធាតុដី )**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ លោកអ្នកមានអារម្មណ៍ភ្លឺថ្លាគំនិតប្រាជ្ញាឈ្លាសវៃ បើបានជួបពិគ្រោះពិភាក្សាការងាររកស៊ី និងចាប់និយាយត្រូវរ៉ូវ និងមានការចុះសម្រុងនឹងគ្នា ។ ចំពោះ អាជីវករមានមានទំនិញលក់ចេញទិញ ចូលឥតទំនេរដៃ ព្រមទាំងមានភោគផលកម្រៃហូរចូលច្រើនទៀតផង៕

**ឆ្នាំកុរ : (ពង្សមនុស្សស្រី ធាតុទឹក)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសចំពោះកម្មករសំណង់ដែល ប្រកបការងារនៅតាមទីខ្ពស់ទាប ចូរប្រយ័ត្នប្រយែងក្រែងជួបគ្រោះថ្នាក់ធ្លាក់ពីទីខ្ពស់ នាំឲ្យរងរបួសធ្ងន់ស្រាល ហើយអាចឈានដល់ការរលត់សង្ខារទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ មិនត្រូវចាប់ត្រចៀកទន់ជឿសម្តីញុះញង់របស់អ្នកផ្សេងឡើយ ទើបបានសុខសប្បាយចិត្ត ៕



សោភ័ណភាព



# ស.បែបងាយៗតាមធម្មជាតិ

កន្លងមកសុភាពនារីប្រហែលជាបានដឹងខ្លះៗរួចមកហើយថា វីតាមីន C ជាសារជាតិម្យ៉ាងដែលជួយឲ្យស្បែកបានស ។ ដូច្នេះប្រសិនបើចង់ឲ្យស្បែកមុខសនោះ មិនចាំបាច់ទៅបកស្បែកមុខនៅតាមហាងកែសម្ផស្ស ឬក៏ទិញក្រែមធ្វើឲ្យស្បែកសមានតំលៃថ្លៃៗមកប្រើនោះទេ ព្រោះខ្លួនឯងក៏អាចធ្វើឲ្យផ្ទៃសាច់មុខសស្អាតដោយដៃខ្លួនឯងបានដែរ ។

ក្នុងបណ្តាផ្លែឈើទាំងអស់ដែលនៅក្បែរខ្លួនអ្នក ហើយងាយស្រួលរកជាងគេនោះ គឺផ្លែត្របែក ។ ត្របែកនេះ បើតាមការពិសោធន៍គេបានរកឃើញថា វាសំបូរទៅដោយវីតាមីន C ។ ជំហានដំបូងនាំយកផ្លែត្របែក ទៅលាងទឹកឲ្យស្អាត រួចយកវាមកចិតជាចំណិតស្តើងៗទុកមួយអន្លើ ។ បន្តមកទៀតលុបលាងមុខឲ្យស្អាត រួចនាំយកចំណិតផ្លែត្របែកមកត្រដុសឲ្យសព្វពេញផ្ទៃមុខ ។ ប្រសិនបើអ្នកជ្រើសរើសយកត្របែកទុំសាច់វាទន់ជ្រាយល្អងាយស្រួលនៅពេលត្រដុស ។ ក្រោយមកលុបលាងមុខឲ្យស្អាតម្តងទៀត ដោយព្យាយាមធ្វើបែបនេះឲ្យបានរាល់ថ្ងៃនោះ អ្នកនឹងចម្លែកក្នុងចិត្តថា ស្បែកមុខរបស់អ្នកកាន់តែ ស្រស់ថ្លា ហើយស្នាមជាំខ្មៅមុខថយចុះយ៉ាងរហ័សបំផុត៕



សោភ័ណភាព

## ទឹកក្រូចឆ្មារជួយថែបំប៉នក្រចក

ចំពោះសុភាពស្ត្រីដែលកំពុងតែស្វែងរកមើលវិធីថែបំប៉នក្រចកដៃឲ្យស្អាត សូមណែនាំឲ្យសាកល្បងប្រើផ្លែក្រូចឆ្មារដែលមាននៅក្នុងផ្ទះបាយមកប្រើនោះធានាថា នឹងឃើញលទ្ធផលយ៉ាងទាន់ចិត្តបំផុត ។ ពិសេសបំផុតសំរាប់សុភាពស្ត្រីដែលមានក្រចកឡើងលឿងឆាប់ប្រេះបាក់ ព្រោះតែបានឆ្លងកាត់ការលាបថ្នាំក្រចកអស់ពេលជាយូរមកហើយនោះ ។

យើងណែនាំឲ្យអ្នកច្របាច់យកទឹកក្រូចឆ្មារនៅស្រស់ៗ ហើយប្រើសំឡីជ្រលក់បន្ទាប់មកយកវាមកបិទនៅលើក្រចកគ្រប់ម្រាមដៃទាំងអស់ទុកចោលប្រមាណ ១០នាទី រួចហើយអ្នកនឹងឃើញថាសាច់ក្រចកឡើងពណ៌សស្រស់ស្អាតនឹងកាន់តែរឹងមាំឡើងថែមទៀត ។

ក្រៅពីនេះប្រសិនបើនៅតាមកន្ទៀតក្រចកប្រឡាក់ជាប់ទៅដោយធូលីដី ឬជ័រពីផ្លែឈើអ្នកក៏អាចប្រើសំបកក្រូចឆ្មារដែលច្របាច់ទឹកចេញអស់ហើយមកដុសខាត់ត្រង់បរិវេណដែលមានស្នាមប្រឡាក់នោះ កំអែលកខ្វក់ទាំងអម្បាលម៉ាននឹងជ្រះជ្រុះចេញអស់ជាមិនខាន ៕

## ស្បែកមុខហាប់ណែនដោយសារផ្លែល្ពៅ



ដូចយើងធ្លាប់ដឹងកន្លងមកហើយថា ក្នុងផ្លែល្ពៅមានវីតាមីន និងសារជាតិអាហារដែលផ្តល់ប្រយោជន៍ដល់ស្បែក ដូចជាវីតាមីន A វីតាមីន C ស័ង្កសីដែលជួយលាងបន្ថែមនូវ ខលឡាជេន ដល់ស្បែក។ ពេលនេះយើងសូមលើកយករូបមន្តតាមបែបធម្មជាតិជួយលើកសោភ័ណដល់ស្បែក ដោយប្រើប្រាស់ផ្លែល្ពៅតាមការណែនាំដូចខាងក្រោម ÷

**វត្ថុដែលត្រូវត្រៀម :** សាច់ផ្លែល្ពៅទុំកិនឲ្យម៉ដ្ឋ២ស្លាបព្រាកាហ្វេ, ទឹកឃ្មុំកន្លះស្លាបព្រាកាហ្វេ, ទឹកដោះគោជៅ ឬទឹកសណ្តែក១ភាគ៤ស្លាបព្រាកាហ្វេ ក្រោយពេលត្រៀមសព្វគ្រប់ហើយអាចចាប់ផ្តើមដូចតទៅ :

នាំយកគ្រឿងផ្សំទាំងអស់មកលាយច្របល់ចូលគ្នាឲ្យសព្វ យកល្បាយដែលលាយរួច ហើយទៅបិទបំពោកឲ្យពេញផ្ទៃមុខខាងលើត្រង់ភ្នែក និងដុំវិញមាត់ទុកចោលរយៈពេលពី១០-១៥នាទី ប្រើទឹកក្តៅឧណ្ហៗលាងជម្រះលាបក្រែម ឬម៉ំយជីវ៉េស៊ីរជាការបញ្ចប់ ។

រូបមន្តបន្ថែមសម្ផស្សដោយខ្លួនឯងនេះ អ្នកអាចនាំទៅប្រើប្រាស់បានក្នុងមួយសប្តាហ៍ពី១-២ដង ។ គ្រាន់តែប៉ុណ្ណឹងសម្រស់នឹងបានស្អាតដូចជាសុភាពនារី មានសុខភាពល្អមិនខាន ៕

**To Place an ad, call (267) 253-3947**
**e-mail KhmerPostUSA@gmail.com**

## តើលោកអ្នកត្រូវការធ្វើអ្វី?
## មានទទួលជួសជុលផ្ទះ

* Painting
* Cleaning
* Demolition
* Carpentry
* Chimneys
* Windows
* Doors
* Decks
* Roofs
* Plumbing
* Siding ÇÇ
* Mold
* Water Damage
* Trees
* Snow Removal

If I can't do ,
I'll get someone that can.

Ray
(978) 401-8250

## សេវ៉ាជំនួយការ អន្តោប្រវេសន៍ ក្រុងឡូវែល
## Lowell Immigration Service"

សូមទាក់ទងមក លោក លីក និស្ស័យ
Nissay Liek

217 Appleton Street
Lowell, MA 01852

(978) 654-5168 Office
(978) 265-6507 Cell
Email: Nissayliek@yahoo.com or Nliek@comcast.net

## លក់ ឬជួលភោជនីយដ្ឋាន
## OPEN CAMBODIAN RESTAURANT

-Northeast Philly- PA 5th & Chew. Closed Korean Rest. Furniture & 3 bedrooms on 2nd flr. Lease/buy the business & property. All restaurant equipments are in placed and ready to open business anytime.

Call Peter 215-668-1666

## Cargo *plus* East LLC.

លោកអ្នកចង់ផ្ញើអីវ៉ាន់ទៅភ្នំពេញ

យើងធានាថា ទំនិញលោកអ្នក នឹងផ្ញើទៅដល់ទីដៅ១០០% យើងយកទំនិញដោយផ្ទាល់ដៃទៅដល់មាត់ទ្វារផ្ទះ នៅគ្រប់កន្លែងនៃភ្នំពេញ យើងមានបទបញ្ជាថា "គ្មានយកកំរៃបន្ថែមណាផ្សេង" ទៀតទេ ប្រអប់ផ្ញើរបស់លោកអ្នកនឹងទៅដល់កន្លែងក្នុងកំណត់ ៥៥ថ្ងៃ យើងបញ្ជូនទំនិញចេញទៅភ្នំពេញរៀងរាល់សប្តាហ៍




តាមប្រអប់ទំហំ ***21"x21"x33"*** គ្មានកំណត់ទម្ងន់

For more details, call Toll Free No: 1877-463-6217
OR KENT (267) 240-9532
Email:kkent747@yahoo.com

## ផ្ទះ Duplex តម្លៃ $80.000

នៅជ្រុងផ្លូវ 12Th st. និង Ruscomb st.
North Philadelphia
ផ្ទះធ្វើរួចហើយ. បង្គួចថ្មី.
ចង្ក្រានបាយ និងដំបូល
រៀបជាបន្ទប់ អាចនៅបានបីគ្រួសារ
ឥឡូវនេះមានពីរគ្រួសាររស់នៅ.
ដែលបង្កើតប្រាក់ចំណូលបានភ្លាម



ទូរស័ព្ទ : ពៅ ឆាយ 267-258-6841

## ហាងលក់ទូរស័ព្ទដៃ និងបង់ប៊ិល Bills
## LICO WIRELESS & GENERAL SERVICES

Authorized Dealer: metroPCS, CLEAR, boost mobile,Virgin mobile & Accessories, Prepaid Phone, Unlock GSM Phone, Refill all prepaid wireless, Phone Cards, Pay all bills, Fax & Photo copies services

Monday – Saturday:
10:00AM – 7:00PM

337 Westford Street, Lowell, MA 01851
Tel: (978) 735-4100 Fax: (978) 735-4114

## APARTMENT FOR SALE



4 Apt Units on 3rd & Grant Ave.
Northeast Phila, PA

Each/1 Bed, 1 Bath, Living room & Kitchen. Currently occupied. Generate Immediate Income.

**Asking Price $230.000.**
Contact: 267-242-5428

## HELP WANTED

PT Teacher's Aide: Bilingual PT Teacher's Aide needed immediately for Head Start/Pre-K Counts Early Childhood Education Center. No Experience required! Start immediately!

Please call (215) 389-2991 ask for the Director or email FDN@FDN.comcastbiz.net.

## IN WICHTA FALLS TEXAS

**មានហាង LIQUOR នៅរដ្ឋ TEXAS ត្រូវការលក់ទាំងអគារទាំងដីរួមទាំងកន្លែងលាងឡានមួយទៀតផង ក្នុងតម្លៃ $690.000 (អាចនិយាយតថ្លៃគ្នាបាន)**

Excellent location, including land.
Liquor business (1,500 square feet), and new car wash.
Big Corner lot, good visibility, additional building can be added.
Drive through, short hour Check cashing/lottery/western union
Take home $14,000 per month income
Asking $690,000+inventory (negotiable)

Please Call Rick : 940-337-7633 (Cell), 940-687-9988 (Store)

## AUTO GARAGE FOR SALE

HASS'S AUTO ជួសជុលតួឡានដែលបុកគ្នាម្ចាស់ហាងចូលនិវត្តន៍ -ហាងមានដំណើរការ១៧ឆ្នាំមកហើយ -ពាណិជ្ជកម្មមានលំនឹងល្អគ្រប់រដូវលោកអ្នកអាចទិញតែពាណិជ្ជកម្មក៏បាន -ទិញដីជាមួយនឹងផ្ទះក៏បាន -ទិញទាំងពីររួមគ្នាក៏បាន បើចង់ដឹងច្បាស់
សូមទូរស័ព្ទរកឈ្មោះ "នីក"

17 years well established business.




Please Call Nick : 267-242-7938 For Showing

# ខែតុលានេះខ្មែរនៅបរទេសធ្វើមហាបាតុកម្មរួមគ្នាដើម្បីការពារទឹកដី

**ដោយ : អ៊ុម ឈឿម**

ទោះបីជាបច្ចុប្បន្ន ប្រទេសកម្ពុជាហាក់មានការកែទម្រង់នូវមុខមាត់ថ្មីរបស់ខ្លួនបានយ៉ាងសម្បើមយ៉ាងណាក៏ដោយចុះក៏នៅមានមជ្ឈមណ្ឌលមហាជនមួយចំនួនធំបានបញ្ចេញនូវទស្សនៈរសជៀង១គ្នាថា ប្រទេសដ៏អភ័ព្វមួយនេះ ក៏កំពុងស្ថិតនៅជាប្រទេសរងគ្រោះយ៉ាងដំណំនៅឡើយ ព្រោះដោយការរំលោភឈ្លានពានពីសំណាក់បរទេសជិតខាង គឺ សៀម និងយួន បើទោះជាមានសន្ធិសញ្ញាលក្ខណៈអន្តរជាតិក៏ដោយចុះ ។

ចំពោះការបាត់បង់នូវទឹកដីជាហូរហែរនេះ ត្រូវបានពលរដ្ឋខ្មែរមួយចំនួនធំ ទាំងក្នុងប្រទេស និងក្រៅប្រទេស បានទម្លាក់កំហុសលើរដ្ឋាភិបាលថា ពុំបានឈឺឆ្អាលចំពោះបូរណភាពដែនដី តែបែរជារណបក្តោបកន្ទុយចំពោះបរទេសដែលជាអ្នកឈ្លានពានទឹកដីរបស់ខ្លួនទៅវិញ ។ ទោះជាយ៉ាងនេះក្តី រដ្ឋាភិបាលកម្ពុជា តែងតែច្រានចោលទាំងស្រុងចំពោះការចោទប្រកាន់នានា ពីសំណាក់ក្រុមអ្នករិះគន់ជាពិសេស គណបក្សប្រឆាំងតែម្តង ។

ដោយឡែកចំពោះខ្មែរនៅបរទេសឯណោះវិញ ក៏តែងតែបង្ហាញនូវក្តីបារម្ភរបស់ពួកគេមិនតិចប៉ុន្មានឡើយ ចំពោះការបាត់បង់ទឹកដី និងការឈ្លានពានជាហូរហែរពីសំណាក់បរទេសនេះ ។ ក្នុងខណៈដែលលោកអគ្គលេខាធិការនៃអង្គការសហប្រជាជាតិបាន គីមូន គ្រោងមកទស្សនៈកិច្ចជាប្រវត្តិសាស្ត្រនៅប្រទេសកម្ពុជា នាថ្ងៃទី២៧-២៨ ខែតុលានេះ ខ្មែរនៅបរទេស មានសហរដ្ឋអាមេរិក, បារាំង និងកាណាដា ក៏គ្រោងនឹងធ្វើមហាបាតុកម្មអហិង្សាមួយដើម្បីបង្ហាញនូវសាមគ្គីភាព និងបំណងរកសន្តភាពពិតប្រាកដមួយជាមួយប្រទេសជិតខាង គឺសៀម និងយួន ។

តាមរយៈខ្លឹមសារក្នុងសេចក្តីប្រកាសរួមមួយដែលធ្វើឡើងដោយក្រុមអ្នករៀបចំបាតុកម្មនៅបរទេស បានផ្តោតយ៉ាងសំខាន់ទៅលើបញ្ហាបូរណភាពដីកដី និងបង្ហាញអំពីឆន្ទៈនៃការឈឺចាប់, ការព្រួយបារម្ភចំពោះផលប្រយោជន៍ខ្មែរ ដែលតែងតែបាត់បង់ទឹកដីជាបន្តបន្ទាប់ ព្រោះមហិច្ឆិតាបរទេសជិតខាងនោះ។

ក្នុងខ្លឹមសាររបស់សេចក្តីប្រកាសដដែលនោះបានឱ្យដឹងថា មហាបាតុកម្មនេះនឹងប្រព្រឹត្តឡើងនៅទីតាំងចំនួនបួនកន្លែងខុស១គ្នា ដោយ **ទី១-** នឹងធ្វើនៅមុខទីស្នាក់ការអង្គការសហប្រជាជាតិនាបូរីញ៉ូយ៉ក នាថ្ងៃទី២២ ខែតុលា ឆ្នាំ២០១០ និង **ទី២-** នៅមុនទីស្នាក់ការអង្គការសហប្រជាជាតិនាទីក្រុង សាន់ហ្វ្រេនស៊ីស្កូ នៅថ្ងៃជាមួយគ្នា។ ចំណែកក្រុមទី៣នៃក្បួនបាតុកម្មត្រូវធ្វើនៅមុនសភាជាតិនៃទីក្រុងអូតាវ៉ា ប្រទេសកាណាដា គឺចំថ្ងៃខែជាមួយគ្នាដែរ ។ ដោយឡែកក្រុមទី៤ ត្រូវធ្វើនៅឯទីក្រុងប៉ារីស ប្រទេសបារាំង នៅថ្ងៃទី២៤ តុលា ឆ្នាំ ២០១០ នៅទីលាន ត្រូកាដេរ៉ូ ។

គោលបំណងចម្បងក្នុងការធ្វើបាតុកម្មដ៏ធំមួយនេះ ត្រូវបានបញ្ជាក់នៅក្នុងលិខិតនោះថា :

១- បង្ហាញនូវសាមគ្គីភាពជាត មិនឱ្យមានការប្រមាថ ម៉ាក់ងាយពីប្រទេសជិតខាង។

២- បង្ហាញឱ្យប្រទេសជិតខាងបញ្ឈប់ជាបន្ទាន់នូវអំពើឈ្លានពានមកលើកម្ពុជា។

៣- ដើម្បីដាក់ញត្តិទាមទារឱ្យលោកអគ្គលេខាធិការនៃអង្គការសហប្រជាជាតិ ជួយដោះស្រាយបញ្ហាវិបត្តិព្រំដែន ដែលកំពុងតែកើតមានជម្លោះជាមួយនឹងប្រទេសជិតខាង និងសើរើពិនិត្យឡើងវិញនូវការអនុវត្តន៍កិចព្រមព្រៀងសន្តិភាពក្រុងប៉ារីស ថ្ងៃទី២៣ តុលាឆ្នាំ ១៩៩១ សម្រាប់កម្ពុជា៕

# HONG KONG
## Super Market

FAMER´S BEST

Newly Renovated. Added new section .

Clean and Improved management !

ទើបនឹងកែលំអរថ្មីឡើងវិញ

-បន្ថែមផ្នែកលក់ថ្មីទៀត ហាងស្អាត ហើយបង្កើនគុណភាពគ្រប់គ្រង

**Weekly Sale** លក់ចុះថ្លៃរៀងរាល់សប្ដាហ៍

**HONG KONG SUPERMARKET (PA) WEEKLY PROMOTION ITEMS**

# ON SALE



4/$5




$4.99 per box




$0.69 per Can



$3.99 per Bag



3/$10



3/$1.99



$4.89 per lb



$1.99 per BLT



$1.29 per BLT




4/$3




3/$10

**571 ADAMS AVE.PHILADELPHIA, PA 19120 Tel : 215-7281300 Fax : 215-728-1600**

- ចំណាយ $140 ដុល្លារ ទទួលបានអង្ករស្រូវស 25 ផោន
- ចំណាយ $100 ដុល្លារ ទទួលបានទូរភេសជ្ជៈ ឬទឹកញ៉ុបមួយប្រអប់ ( តម្លៃ 8.99 )
- ចំណាយ $25 ដុល្លារ ទទួលបានទឹកស៊ីអ៊ីវមួយដប ឬទឹកត្រីមួយដប ។

OPEN 7DAY 8:00-9:00

ឥតយកថ្លៃ
លើ
វីតាមីន

ឥតយកថ្លៃ
លើ
ថ្នាំចាក់ ឬលេបបង្ការជម្ងឺ

ឥតយកថ្លៃលើ
យកវេជ្ជបញ្ជាទៅទិញថ្នាំ
និងបញ្ជូនថ្នាំមកវិញដល់ផ្ទះ

# Rx EZ PHARMACY

**INTRODUCING THE MOST COST EFFECTIVE PLAN FOR SELECTED GENERIC DRUGS**

**$3.99**
ថ្នាំសម្រាប់ប្រើ30ថ្ងៃ

**$12.99**
ថ្នាំសម្រាប់ប្រើ90ថ្ងៃ

**215-728-6300**

**Bela M. Patel**
Pharmacist

Hours: M-F 9-7, Sat 10-3, Sun Closed
1701 Cottman Ave. Philadelphia, PA 19111




## Penn Asian Senior Services

**Certified Nurse Assistant (CNA) Certification Classes**

**Class starts October 11th, 2010**

**Certified Nurse Aide (CNA) Program**

**Penn Asian Vocational Institute (PAVI)**

This 120 hour training program is offered evenings and weekends. The first component is classroom instruction by RN instructors at the PAVI training facility in Jenkintown. The second component is technical training held at a local nursing home. The course is conducted in English. PAVI offers the CNA program three 3 times annually. Graduates are required to pass the state exam to become a PA Certified Nurse Aide.

**កម្មវិធី Certified Nurse Aide**

កម្មវិធីហ្វឹកហ្វឺនដែលមានរយៈពេល 120 ម៉ោងនេះមាននៅពេលល្ងាច និងនៅចុងសប្តាហ៍ ហើយមានពីរផ្នែក។ ផ្នែកទីមួយគឺការបង្រៀននៅក្នុងថ្នាក់នៅកន្លែងហ្វឹកហ្វឺនរបស់ PAVI នៅ Jenkintown ដោយមានអ្នកបង្រៀនដែលជា RN ។ ផ្នែកទីពីរគឺការហ្វឹកហ្វឺនផ្នែកបច្ចេកទេសដែលធ្វើឡើងនៅ Rydal Park Nursing Home។ មុខវិជ្ជាទាំងអស់មានបង្រៀនតែជាភាសាអង់គ្លេសទេ។ PAVI មានកម្មវិធី CNA បីដងក្នុងមួយឆ្នាំ។ អ្នករៀនចប់ត្រូវប្រឡងជាប់ការប្រឡងថ្នាក់រដ្ឋដើម្បីក្លាយជា PA Certified Nurse Aide។

**Requirements:**
*Complete Application
*resume'
*Personal statement
*950$ tuition
*18 years and older
*High School Diploma/GED/or able to read and write at a 6th grade level
*Pass background check
*2 steps PPD or Chest X-ray
*Physically able to perform CNA

Offer in Philadelphia and Southern New Jersey
**Only**

Call 215-572-1234
For more information visit: www.passi.us




# ពេទ្យថែរក្សាធ្មេញប្រចាំគ្រួសារ

## FAMILY DENTAL CARE
AT
## SMILE CARE CENTER

626 Snyder Avenue. Philadelphia, Pa 19148

**WE SPEAK CAMBODIAN. PLEASE CONTACT :**
**MALY CHHORN 215-391-4100**

យើងខ្ញុំអាចបកប្រែ
ភាសាខ្មែរជូនលោកអ្នក
សូមទាក់ទងជាមួយ
ឈ្មោះ រ៉ន ហេង
និងជា ម៉ៃនតារ៉
ដើម្បីណាត់
ពិនិត្យ

**Children and Adults Welcome**

- Exams
- Root Canals
- Extractions
- Cleanings
- Braces
- Dental Implants

**We accept all types of insurance including Medicare & Medicaid**
**PLEASE CALL TO MAKE YOUR APPOINTMENT TODAY !**
**(215) 391-4100**

យើងទទួលយកគ្រប់ប្រភេទ អ៊ិនស្វ៊ិន ដោយរាប់ទាំងម៉េឌីឃែ និងម៉េឌីឃេដ ផង សូមទូរស័ព្ទរកយើងខ្ញុំ នៅថ្ងៃនេះ ដើម្បីណាត់ពិនិត្យនូវលេខ **(215) 391-4100**